PRIMERICA
A Citi Company
Chanthy Sek &
Shawn Dougherty
Bus: 1-866-582-3172
Cell: 267-984-8584
Life Insurance
Car Insurance
Refinance Your Debts
Investments
Office or Home Appointment
We also provide translation and interpretation services.
E-mail: 8666823172@primerica.gosolo.com
Primerica Financial Services: 1035 Virginia Dr., Ste 100H, Ft. Washington, Pa 19034

ខ្មែរប៉ុស្តិ៍
THE KHMER POST
ISSUE 48 November 27th - December 10th 2009

ហាងមាសរស្មី
SUNSHINE JEWELRY INC
*Fine Jewelry*
*Certified Diamonds & Custom Design
702 Washington Avenue
Philadelphia, Pa 19147
Phone: (215) 271-2950
Fax: (215) 271-2962
Email: colorofsunshine@yahoo.com

# ពលរដ្ឋខ្មែរនៅ ផែនស៊ីវេនា ប្តឹងមេខ្មែរក្រហម

**ហ្វីឡាដែលហ្វៀ ៖** ព្រឹត្តការណ៍ប្តឹងមេខ្មែរក្រហម ទៅតុលាការអន្តរជាតិ តាំងនៅក្នុងភ្នំពេញ បានកើតនៅទីក្រុងហ្វីឡាដែលហ្វៀ សហរដ្ឋអាមេរិក កាលពីថ្ងៃទី ១៣-១៤ វិច្ឆិកា កន្លងទៅនេះ ។ ពលរដ្ឋខ្មែរក្នុងរដ្ឋផែនស៊ីវេនា ប្រមាណ ១៥០ បានមកចូលរួម ហើយខ្លះដាក់ពាក្យបណ្តឹងបន្តបន្ទាប់គ្នា សារទុក្ខពីទារុណកម្ម និងភាពរងគ្រោះរបស់ខ្លួន បង្កបង្កើតឡើងដោយការគ្រប់គ្រងរបបកុម្មុយនិស្តខ្មែរក្រហម នាចន្លោះឆ្នាំ ១៩៧៥ ដល់ ១៩៧៩ នៅចំពោះមុខមេធាវីរបស់ខ្លួន រៀបចំបែបបទជូនដោយអង្គការក្រៅរដ្ឋាភិបាលមួយ ឈ្មោះ ASRIC A/P/A ។



ទឹកមុខស្រស់បស់ រីងប៉ុង សម្លៀកបំពាក់សមជាមន្ត្រីអង្គប្រជុំធំ ប្រជាពលរដ្ឋខ្មែរ នាថ្ងៃមកដាក់ពាក្យប្តឹងខ្មែរក្រហម នោះ បានសម្តែងការយកចិត្ត **តទៅទំព័រទី ១១**

# ដកអភ័យឯកសិទ្ធិសមរង្ស៊ីជាមាគ៌ាទៅរកសន្តិភាព



**ដោយ ពិន សំខុន ៖**

លោក សម រង្ស៊ី ដំណាង រាស្ត្រ បានត្រូវសភាជាតិ ដកអភ័យឯកសិទ្ធិ ព្រោះតែ បានដកបង្គោលខ័ណ្ឌសីមា ដែលប្រទេសវៀតណាម បានដាំ ដើម្បីចំណាំព្រំប្រទល់ដែនថ្មីរបស់ប្រទេសខ្មែរ និងប្រទេសគេ ។ សម រង្ស៊ី បានធ្វើឱ្យគេចាប់អារម្មណ៍យ៉ាងខ្លាំងចំពោះព្រឹត្តិការណ៍ ព្រំប្រទល់ដែនខ្មែរនេះ ។ **តទៅទំព័រទី ១៤**

សូមអញ្ជើញលោកអ្នកអានអត្ថបទជាភាសាអង់គ្លេស នៅទំព័រខាងក្នុង ដែលបានដកស្រង់ចេញពីសារព័ត៌មាន The Cambodia Daily នៅប្រទេសកម្ពុជា ។

Yoo's Auto Service and Collision
យូ បំរើសេវារថយន្ត
និងរថយន្តគ្រោះថ្នាក់ប៉ះទង្គិច
FREE ESTIMATES
COUPON
$10 OFF TOWARD EMISSION AND STATE INSPECTION
Check Engine Diagnostic
Electronic Wheel Alignment
Certified Enhanced Emission
Inspection & Repairs
Muffler & More
Expert Body Work
Fender & Paint Work
Frame Straightening
Insurance Specialists
SAM 215-457-7777 ឬ 215-457-7779, Fax-215-457-7475
189 W. Duncannon Ave. Phila., PA 19120

Mobile-net
We connect you to the world!
Since 1995
ចុះឈ្មោះថ្ងៃនេះ នឹងទទួលបាន 133 នាទី
6.9 កម្ពុជា
1.9¢
5.5¢
my011.com
1(800) 818-9000

# New Year CELEBRATION HAPPY 2010

Family and Friends are Invited to Celebrate a Year of Hard Work and Look Into a Hopefulness Year of 2010

HOSTED BY: THE KHMER POST

WHEN: 01.01.10 from 6 P.M – 12 A.M.

WHERE: KAVEI RESTAURANT

320 W. Oregon Avenue. Philadelphia, Pa 19148

Authentic Cambodian Foods Will Be Served.

Live Music, Dance, and Play

Gifts Exchanged and FREE Raffles Give Away!

Cost: $40.00

Tickets Are On Sale Now. Please Call 267.253.3947 or 267.254.8758 to Make Your Reservation. No Tickets Sold at the Door. Semi-formal Attire.

# ពិធីលៀងភោជនាហារ រាត្រីចូលឆ្នាំ សួស្តីឆ្នាំ 2010

រៀបចំដោយសារព័ត៌មានខ្មែរប៉ុស្តិ៍

320 W. Oregon Avenue. Philadelphia, Pa 19148

$40

215-253-3947 ឬ 267-254-8758

ពុំមានសំបុត្រលក់នៅមាត់ទ្វារចូលទេ សំលៀកបំពាក់សមរម្យ



# ADAMS DENTAL CENTER

801 ADAMS AVENUE. PHILADELPHIA, PA 19124. TEL: 215-744-8300



- ✓ Crowns,
- ✓ Braces,
- ✓ Bridges,
- ✓ Veneers,
- ✓ Inlay,
- ✓ Gold Caps,
- ✓ Implants,
- ✓ Full & Partial Dentures.

OSHA

ថ្ងៃ ច័ន្ទ : 10am-6pm

ថ្ងៃ អង្គារ : 10am-6pm

ថ្ងៃ ពុធ : 10am-7pm.

ថ្ងៃ ព្រហស្បតិ៍ : 10am-6pm

ថ្ងៃ សុក្រ : 10am-6pm.

ថ្ងៃ សៅរ៍ : 10am-7pm

Cigna Dental, 1201 Dental Plan, Delta Dental, DHA Guardian,Aetna,PPO, Ameri-Health, United Concordia Flex, MetLife, Unicare.

ចុះថ្លៃ 10%

# មូលហេតុដែលនាំឱ្យធ្វើបុណ្យ

# អំណរព្រះគុណ “ THANKSGIVING ”

**ដោយ : ម៉ម យីន :**

●●●បុណ្យអរព្រះគុណ គឺជាបុណ្យដ៏សំខាន់មួយខាងគ្រីស្ទសាសនា ដែលសហរដ្ឋអាមេរិកបានប្រារព្ធធ្វើជារៀងរាល់ឆ្នាំ នៅក្នុងខែវិច្ឆិកា ថ្ងៃ ព្រហស្បតិ៍ ក្នុងសប្តាហ៍ទី ៣ ។

ប្រវត្តិនៃការចាប់ផ្តើមប្រារព្ធធ្វើបុណ្យ ដោយក្រុមអ្នកស្វែងរកសិទ្ធិសេរីភាពក្នុងសេចក្តីជំនឿ បានធ្វើដំណើរមករកឃើញទឹកដីមួយកន្លែង ដែលបានកកើត ជាប្រទេសសហរដ្ឋអាមេរិក កាលពីជាង ២០០ឆ្នាំមុន។ ក្រុមអ្នកស្វែងរកសិទ្ធិសេរីភាពក្នុងសេចក្តីជំនឿ និងការថ្វាយបង្គំព្រះ គេឱ្យឈ្មោះថា " ក្រុមអ្នកធ្វើធម្មយាត្រា" បានមកឃើញទឹកដីដ៏បរិសុទ្ធនេះ ដែលគេសន្មតថាជាទឹកដីព្រះអម្ចាស់ទ្រង់ប្រទានឱ្យដល់គេ ។

នៅពេលនោះ ក្រុមអ្នកធ្វើធម្មយាត្រា បានជួបជន ជាតិឥណ្ឌាណស្បែកក្រហម រួចហើយក៏រួមរស់ជាមួយគ្នា ដោយស្រុះស្រួលគ្នាបង្កបង្កើនផលជាដំណាំផ្សេងៗទៀត សំរាប់ធ្វើជាស្បៀងជាពិសេស គេបានឃើញមាន់ទោ ឬមាន់ដាំងដុងទាំងហ្វូងរស់នៅពេញព្រៃ ដើម្បីឱ្យគេស្រួលងាយក្នុងការចាប់យកមកធ្វើជាអាហារ ។

ការផ្តល់ភោគផលពីដំណាំ និងហ្វូងមាន់ទោ បានធ្វើឱ្យជនជាតិឥណ្ឌាណស្បែកក្រហម និងជនជាតិអង់គ្លេស ជាអ្នកធ្វើធម្មយាត្រា អាចផ្គត់ផ្គង់ម្ហូបអាហារ ចិញ្ចឹមជីវិត បានរស់ប្រកបដោយសេចក្តីសុខសាន្ត សប្បាយរីករាយនោះហើយ ទើបគេចាត់ទុកថា ជាអំណោយនៃព្រះ-អម្ចាស់បានប្រទានដល់គេ ។

ដោយសារតែមានជំនឿយ៉ាងមុតមាំទៅលើព្រះអម្ចាស់នេះហើយ ជាមូលហេតុនាំឱ្យជនជាតិឥណ្ឌាណស្បែកក្រហម និងជនជាតិអង់គ្លេស ជាអ្នកធ្វើធម្មយាត្រា បានចាប់ផ្តើមប្រារព្ធធ្វើបុណ្យអំណរព្រះគុណនេះ មុនដំបូងគេបង្អស់ ក្នុងពេលប្រកាសយកទឹកដីបរិសុទ្ធរបស់ព្រះទ្រង់ប្រទាន ដើម្បីបង្កើតជាសហរដ្ឋអាមេរិក រហូតមកដល់សព្វថ្ងៃនេះ ។

បុណ្យអំណរព្រះគុណ ឬ Thanksgiving នេះ ជាបុណ្យដ៏សំខាន់ និងដ៏ធំបំផុត នៅក្នុងគ្រីស្ទសាសនា នៅក្នុងសហរដ្ឋអាមេរិកទាំងមូល និងគ្រីស្ទបរិស័ទ នៅក្នុងពិភពលោក បានប្រារព្ធធ្វើបុណ្យអរព្រះគុណនេះ ដោយជួបប្រជុំគ្នានៅក្នុងព្រះវិហារនៃព្រះយេស៊ូវគ្រីស្ទ ថ្វាយបង្គំព្រះសិក្សារៀនសូត្រព្រះបន្ទូល ច្រៀងបទតម្កើងព្រះអង្គ ស្តាប់ការអធិប្បាយព្រះបន្ទូល និង បរិភោគម្ហូបអាហារជាមួយគ្នា នៅក្នុងសេចក្តីសប្បាយរីករាយជាពិសេស គេនាំគ្នាបរិភោគសាច់មាន់ទោ ជាការរំឭក និងសំដែងអំណរគុណដល់ព្រះអម្ចាស់ ។

បច្ចុប្បន្ននេះ នៅក្នុងឱកាសពេលបុណ្យអំណរព្រះគុណ នៅគ្រប់គេហស្ថានគ្រីស្ទបរិស័ទទាំងអស់ សុទ្ធតែមានអាំងមាន់ទោ បរិភោគជាអាហារ ជួបជុំក្រុមគ្រួសារ ញាតិសណ្តាន មិត្តភក្តិ ដោយក្តីសប្បាយរីករាយ ដែលបានក្លាយជាទំលាប់នៃបុណ្យអំណរព្រះគុណព្រះអម្ចាស់ យេស៊ូវគ្រីស្ទ-ដែលជាព្រះបានបង្កើតមនុស្ស និងរបស់សព្វសារពើ និងសព្វសត្វដែលមាននៅលើលោកីយនេះ ៕

សប្បាយរីករាយបុណ្យអំណរព្រះគុណ !

Happy Thanksgiving !

*សម្ភាសន៍:* **អ្នកចូលរួមពិធីដាក់ពាក្យបណ្តឹងមេខ្មែរក្រហម**

**ខ្មែរប៉ុស្តិ៍**

●●●ក្នុងឱកាសដែលពលរដ្ឋខ្មែរ នៅរដ្ឋផែនស៊ីវេនា ដាក់ពាក្យប្តឹងចំពោះរបបខ្មែរក្រហម ដឹកនាំដោយ ខៀវ សំផន នួន ជា អៀង សារី និង អៀង ធីរិទ្ធ កាលពីថ្ងៃទី ១៣-១៤ វិច្ឆិកា ២០០៩ ពេលនោះអ្នករងគ្រោះដោយ របបកុម្មុយនិស្តខ្មែរបានបញ្ចេញយោបល់ថា :

**ពាលុច** : ការប្តឹងនេះ មានប្រយោជន៍យើងមានការភ្ញាក់រលឹកការឈឺចាប់ពីខ្មែរក្រហមបានប្រព្រឹត្ត តែខ្ញុំមិនអាចទាយទុកបានថា ពួកនោះនឹងមានទោស ឬក៏គ្មានទេ ស្រេចតែតុលាការគេសម្រេច ប្រសិន បើតុលាការថា គ្មានទោសទេនោះ ខ្ញុំនឹងយល់ស្រប ។

**ម៉ម យីន** : ការយើងធ្វើ ដូច្នេះ មានប្រយោជន៍សំខាន់ណាស់ ពីព្រោះយើងត្រូវការផ្តល់យុត្តិធម៌ខ្ញុំជនរងគ្រោះ អ្នកទាំង បួននាក់ត្រូវតែទទួលទោសទៅតាមការទទួលខុសត្រូវ ប៉ុន្តែអ្នកដែលនៅពីលើពួក



គាត់ នោះត្រូវទទួលខុសត្រូវដែរ បើសិនជាតុលាការកាត់ទោសថា គ្មានកំហុសទេនោះ ខ្ញុំពុំយល់ស្របទេ តិចឬច្រើនត្រូវតែមានអ្នកនៅពីលើគេ គឺសម្តេចស៊ីហនុ និង ខៀវ សំផន។

**គីម សឿម** : ប្តឹងមេខ្មែរក្រហមថ្ងៃនេះ ជារឿងសំខាន់ ខ្ញុំឥតដឹងថា នរណាមានកំហុសអីទេ តែខ្ញុំជាអ្នករងគ្រោះដោយសារកុម្មុយនិស្ត ឃើញមានចិន និងយួនមកពេញកម្ពុជា បើតុលាការកាត់ទោសហើយ ថាអ្នកទាំងនោះឥតមានកំហុស ខ្ញុំក៏យល់ស្របដែរ ព្រោះខ្ញុំឥតឃើញអ្នកទាំងនោះមកសម្លាប់ផ្ទាល់ទេ។

**ស៊ុម ហុងអេង** : ប្តឹងមេខ្មែរក្រហមវាសំខាន់



ហើយតែខ្លាចល្បិចរដ្ឋកម្ពុជា យកទៅប្រើមិនត្រឹមត្រូវអ្នកទទួលខុសត្រូវទាំងអស់គួរតែមានទោស ហើយនៅមានអ្នកឯទៀត បន្ថែមពីអ្នកទាំងបួន ដែលគ្រាន់តែផ្តើមទេ បើតុលាការថា គ្មានកំហុសទៅវិញខ្ញុំមិនយល់ស្របទេ។

បទសម្ភាសន៍មួយចំនួនទៀត រៀបរាងជាភាសាអង់គ្លេស ដោយ : **ដាណាលី សម** ៕


**ក្រុមហ៊ុនទេសចរណ៍ខ្មែរ**

Since 1997

ក្នុង និងក្រៅប្រទេស

LOW FARE TRAVEL, NIC.

Domestic & International

OFFICE IN THE UNITED STATES

CALIFORNIA-FLORIA-ILLINIOS-N.COLOLINA-MASSACHUSET

**មានសេវាបំរើ**
-លក់សំបុត្រក្នុង/ក្រៅស្រុក
-ថតរូប Passport
-ធ្វើ Passport
-បកប្រែឯកសារ
-Lowyer referrals

**1800 s. 15TH Street. . Philadelphia , PA 19145 USA**

តម្លៃថោកពិសេសទៅស្រុកខ្មែរ,ឡាវ និង វៀតណាម

Special offers to Cambodia/Lao, Thai & Vietnam :

**ទៅលេងស្រុកខ្មែរ.....**

មានតម្លៃពិសេសជូនលោក លោកស្រី លោកយាយ លោកតា បងប្អូន មីងមា ក្នុងឱកាសបុណ្យភ្ជុំបិណ្ឌ បុណ្យអុំទូក អកអំបុក និងសំពះព្រះខែ ។

សូមជ្រើសរើសយន្តហោះដែលលោក លោកស្រី លោកយាយ លោកតា បងប្អូន មីងមា ចង់ជិះធ្វើដំណើរតាមបំណង....

To book a reservation call @
PHONE 215-462-0886 / Cell 215-833-3669

ពេលម៉ោងបើកទ្វារពីម៉ោង ៤-៨ ល្ងាច ក្នុងមួយសប្តាហ៍ ហើយពីម៉ោង ១០-០៤ ល្ងាច សំរាប់ថ្ងៃសៅរ៍ ចុះតម្លៃពិសេស សំរាប់ធ្វើដំណើរទៅកាន់អាស៊ីអគ្នេយ៍

We're accepted all methods of payment. We're very Proud to serve you for the last 11 years, and your business with is highly appreciated



## The Khmer Post Directory

**East Coast Publication**

Regional Editor : Pin Samkhon
Email : pinsamkhon@gmail.com
Writers : Mam Yin
Kim Phean
Im Loeurm
Bopea Chum

**Advertising**
**Marketing Manager:**
**Sabane Thach**
**Phone : 267-253-3947**
**Email : sabane.thach@gmail.com**

**West Coast Publication**

RegionalEditor : Sovannara Meach
**Phone: (562) 313-2129**
**Email: sovannara04@yahoo.com**


## មាតិកាអត្ថបទ

# Khmer Rouge Survivors Seek Justice



DANNALY SAM
THE KHMER POST

*...PHILADELPHIA, PA-in collaboration with the Khmer Post East Coast, the Cambodian Association of Greater Philadelphia, and Mental Health of Southeastern Pennsylvaniaon November 14th, Khmer Rouge survivors perched on their seats waiting to hear from ASRIC representatives in the PRO-ACT meeting room on Third and Callow hill Streets. The meeting was conducted by the Applied Social Research Institute of Cambodia (ASRIC) and the Asian/ Pacific/American Institute (a/p/a) as an initiative to file Victim Information Forms to the Extraordinary Chambers in the Courts of Cambodia (ECCC). Participants' emotions varied from one person to the next, as questions and doubts about the results and the claims process were queried to professional volunteers in the Cambodian Diaspora Victims' Participation Project (CDVPP). There were also many people who were very happy that they had the chance to seek their piece of justice.*

**Sun Bun**

I am very happy that ASRIC decided to help because I don't have any rights to help, nor do I know how to. This country isn't my country and I don't know in what way and how I could approach this problem. I wanted to know who the biggest leader of the Khmer Rouge is. I believe that Sihanouk is above all of them. I am not happy that the courts are only trying a number of people, because I want the biggest person to be tried. The Chinese and Vietnamese are the biggest at fault.

**Chea Meas (SRP Phila)**



I came because I wanted to support this event. I didn't place a complaint today, but I did two years ago. I was fourteen years of age when my parents were killed. This is a process to try to reinforce the Khmer Rouge Courts. This is the first time the organization came to Philadelphia and gives people the opportunity to seek justice. This is the first start if the courts want to bring more people to the court; it is up to the victims, though. I believe through the international courts system there will be justice. This is because I believe the Cambodian government is under puppet control.

**Roeurm Long (CAGP, Vice President)**



This even is im-portant. I also want it to happen and bring justice. It is more than wonderful. When the courts start they [victims/survivors] just want the results. It's amazing and wonderful because no one can for thirty years stand complaints, but this legal team puts everything together and it's very good. As one of the leaders of the Cambodian Association, I am involved in a lot of activities...this can educate the public and let them know about our stories.

**Judge Ida Chen** (Court of Common Pleas, First Judicial District of Pennsylvania)



A signal that someone like me, who is a real judge is here. Other judges aren't here because they aren't aware and connected. I also came here to support people who support me. The Khmer people just recently threw an election party for me.

**Somrith Som (CAGP, President)**



I think it's a good thing. We should not wait thirty years to do the right thing, but at least we have a chance. We probably don't have the resources, and this is a great opportunity to help this happen. The whole wide world knows what's happening in Cambodia. This program was created to help the healing process. I only hope for more resources to allow this workshop to happen, again.

**Lee So**



Three years and eight months, how come there wasn't any aid to help Cambodian civilians and the country to find refuge and protection from the Khmer Rouge? I want the head of the Khmer Rouge to be tried by the court for the murdering of two million people and not get away with this. ASRIC has a legal team that will help civilias, because without help, these stories will be forgotten. If justice is used, then there will be results. Those four people will not be the only ones and they will not get away with it. The Khmer Rouge made people suffer. The victims were worse off than animals because they were kept like slaves.

**Somrith Pen**



How many percent can we know that there will be results? How many years and months can we know the results? I want the homeland of Cambodia to not be given up to other countries. If there is a loss of culture, then there is a loss of religion. Homeland security must protect all people. I want more Cambodians who were responsible communist to be99 charged and tried. Those who are responsible will be found if the effort is made. If the international court really does help, then the Khmer people will be happy. I also hope that the organizers will move the case forward for trial and the execution.

**Sokroun Heng**



I wanted to hear about the execution of the Khmer Rouge people because I'm still mad about the things they did to me. I left the country, and my children died after one year [the Khmer Rouge] went in. I will file a complaint because I want to help adding to the case. I feel a lot better because I know that there will be help.

**Lien Danh**



I've never told my personal stories to anyone other than my comrades, and never any newspapers, lawyers, or any people of this sort. This is my first time coming to such an event. I'm not scared of any consequences, but I'm happy, instead, because people will know what has happened. I'm hapy and believe that not only the four people will be tried but more. I believe there will be results. I would shoot him if I was in Cambodia.

**Kong Iv**



I've never told anyone before, and I feel so lucky that I've been able to survive. I only spoke to my friends about this, and that gave no results, unlike this, which gives some results. I hope that any complaint will help the case against the traitors. There might be more trials and convictions of more people in the future.

*(Continued on page 05)*





**New World Travel II**

ញូវលត្រាវែលធូ

Specialized in Selling Flight Tickets
For National and International

ជំនាញខាងលក់សំបុត្រយន្តហោះសំរាប់ក្នុងប្រទេស និងអន្តរជាតិ យើងតំណាងឱ្យក្រុមហ៊ុន ចិន កូរ៉េ កាថេ ។ល។ ធ្វើលិខិត Re-Entry Permit ប្រញាប់ជូនបានទិញសំបុត្រជិះនាវាសមុទ្រ សណ្ឋាគារ ឬ ជួលឡាន សំបុត្រយន្តហោះទៅច្រើនប្រទេសក្នុងតម្លៃទាបបំផុត ។

Represented Several of Company such as China, Korea, Cathay etc.,
Offer Rush Re-Entry Permit
Reserve Cruise, Hotels and Car Rentals
Best Price Air Ticket for Many Destinations

600 Washington Ave Suite #8
Philadelphia, Pa 19147
Tel: (215) 463-1257
Fax: (215) 463-2036

*(Continued from page 04)*

# Khmer Rouge...

**Yoeun Lieng**



I did file a complaint and this was to find my husband, whether he's alive or dead. I think they will help to find my husband. He was a soldier and was told to pick up soil and then disappeared. He's been missing since 1976. I have two children, and I've been trying to find him so that he can take care of them. I was happy to come here because help was given. I believe there will be some effect, but I don't know what.

**Dr. Leakhena Nou (founder of ASRIC)**



How can ordinary individuals like myself be a catalyst for this? Personally for me, there's a deep satisfaction that I'm able to help witnesses and future generations to put one of the worst crimes in humanity in the 21st century, and find healing and solace in whatever that may be. It's a moral and cultural obligation as a Cambodian period. And it is the right thing to do to promote human rights and promote healing in societies around the world.

# មានអ្វីសម្រាប់ចូលឆ្នាំថ្មីសកល២០១០!



***ដោយ ម៉ម យ៉ឺន :***

•••សង្ខាតវិលជុំវិញខ្លួនឯងនៃផែនដីបាន១ជុំក្នុង១ថ្ងៃ និងជុំវិញព្រះអាទិត្យបាន១ជុំ ក្នុង១ឆ្នាំ ដែលជាសញ្ញាពីការវិវឌ្ឍប្រែប្រួលទៅនៃ ថ្ងៃ ខែ ឆ្នាំ ។

រយៈពេលពេញ ១ ឆ្នាំកន្លងទៅ គឺជាពេលវេលាមួយដែលបណ្ដាជនម្នាក់ៗ រមែងបានខំប្រឹងប្រែងកែច្នៃលក្ខណៈស្ថានភាពជីវិតរបស់ខ្លួន ដោយប្ដេជ្ញាតាំងចិត្តថាក្នុង១ឆ្នាំនេះ ត្រូវតែបំពេញភារកិច្ចទៅតាមមុខនាទីមុខរបរដែលម្នាក់ៗ បានជ្រើសរើសយកមកប្រកបជារៀងរាល់ថ្ងៃ ដើម្បីបានកំរៃជាប្រាក់បៀវត្ស ជាប្រាក់ចំណេញ ឬប្រាក់រង្វាន់សំរាប់មកបំពេញការខ្វះខាតចិញ្ចឹមជីវិតខ្លួន និងគ្រួសារ ព្រមទាំងកែច្នៃសុវត្ថិភាពគ្រួសារឱ្យមានកិត្តិយស មានតម្លៃ មានសុភមង្គលឱ្យកាន់តែល្អប្រសើរឡើងៗ មានន័យថា កិត្តិយសក្តីសេចក្តីថ្លៃថ្នូក្តី សេចក្តីសុខសាន្តក្តី សុវត្ថិភាព និងសុភមង្គលក្នុងគ្រួសារក្តី បានកើតចេញមកពីការខិតខំប្រឹងប្រែង ព្យាយាម ស្វែងរកដោយខ្លួនឯងម្នាក់ៗ ទើបបានសម្រេចជោគជ័យក្នុងជីវិតជាពិតប្រាកដ ពីមួយឆ្នាំទៅមួយឆ្នាំទៀត ។

បណ្ដាប្រជាជនក្នុងលោកស្ទើរតែ ១០០% បានផ្ដោតអារម្មណ៍របស់ខ្លួន នៅក្នុងពេលបំណាច់ឆ្នាំ ចូលឆ្នាំថ្មីម្ដងៗ ម្នាក់ៗតែងតែដណ្ដឹងសួរគ្នាថា តើនៅក្នុងរយៈពេល១ឆ្នាំ ដែលបានកន្លងទៅនេះ យើងបានធ្វើអ្វី ខ្លះ?

តើស្ថានភាពជីវិតរស់នៅដូចម្ដេចខ្លះហើយ ?

តើបានសន្សំលុយបានប៉ុន្មាន ?

តើមានកូនប្រុស កូនស្រី បានរៀនសូត្រដល់ថ្នាក់ណាខ្លះ និងបានសម្រេចជោគជ័យប៉ុន្មាននាក់ ?

ចំណែកនៅពេលចូលឆ្នាំថ្មី ដែលនឹងមានបន្តទៅទៀត រយៈពេលមួយឆ្នាំខាងមុខ ក៏មានសំនួររំឭកគ្នាថា តើនៅក្នុងឆ្នាំថ្មីនេះ យើងអាចមានគម្រោងធ្វើអ្វីជាថ្មីតទៅទៀត ?

តើឆ្នាំថ្មី នឹងអាចនាំយើងឱ្យទៅតាមសេចក្ដីប៉ងប្រាថ្នារបស់យើងបានឬទេ ? ឱ្យត្រូវទៅតាមពាក្យមួយឃ្លា ដែលនិយាយថា ឆ្នាំថ្មី គឺជាគំនិតថ្មី មានគម្រោងថ្មី ផែនការថ្មី ។

ឆ្នាំដែលកន្លងហួសទៅ ជាឆ្នាំចាស់ តែងតែបង្កើនអាយុឱ្យកាន់តែច្រើនឡើង ប៉ុន្តែវាកាន់តែកាត់បន្ថយអាយុមនុស្សកាន់តែខិតទៅជិតដល់កំណត់លាចាកលោកនេះទៅវិញ ។ មនុស្សម្នាក់ៗ តែងតែយល់ថា ចូលឆ្នាំថ្មី យើងសប្បាយរីករាយណាស់ ដោយសារតែបានទទួលជោគជ័យជាច្រើនពីឆ្នាំចាស់មក ហើយមុខជានឹងបានទទួលជោគជ័យប្រសើរទៀត នៅក្នុងឆ្នាំថ្មីខាងមុខនេះ ។

ចំណែកខ្លះយល់ថា ចូលឆ្នាំថ្មី គឺបានធ្វើឱ្យខ្លួនកាន់តែចាស់ កម្លាំងកាន់តែអន់ខ្សោយ អាយុជីវិតរបស់ខ្លួន បានខិតជិតដល់ថ្ងៃមរណភាពណាស់ហើយដែរ ប៉ុន្តែទោះបីជាយ៉ាងនេះក៏ដោយ ក៏វាជាការធម្មតានៃជីវិតរបស់មនុស្ស សត្វទូទៅនៅក្នុងលោក ។

ដោយសារតែនេះជាសភាវធម្មជាតិ ទើបសារព័ត៌មាន ខ្មែរប៉ុស្តិ៍ ដែលជាអង្គការផ្សព្វផ្សាយព័ត៌មានគិតតែពីផ្ដល់ចំណេះដឹងទូទៅ ផ្ដល់ដំណោះស្រាយបញ្ហាផ្សេងៗ ក្នុងនាមជាអ្នកនាំសារនៃការអភិវឌ្ឍន៍នៅក្នុងសង្គម ។ នៅក្នុងរយៈពេល១ឆ្នាំ ២០០៩ បានកន្លងទៅ ខ្មែរប៉ុស្តិ៍ បានបំពេញភារកិច្ចមួយដ៏មហិមាក្រៃ ស្វិតស្វាញ អំណត់អត់ធន់ ទោះបីជាមានការជួបប្រទះនឹងឧបសគ្គ ខ្វះខាតខាងផ្នែកមធ្យោបាយ ជាសម្ភារៈ ឬថវិកាក្ដីយ៉ាងណាក៏ដោយ ក៏ក្រុមប្រឹក្សាភិបាលខ្មែរប៉ុស្តិ៍ បានខិតខំបំរើដល់សហគមន៍ជាតិខ្មែរ និងសង្គមគ្រួសារខ្មែរ ដោយស្មោះស្ម័គ្របំផុត ដែលជាសក្ខីភាពនៃសេចក្ដីពេញចិត្ត និងការប្ដេជ្ញាចិត្តរបស់យើងខ្ញុំទាំងអស់គ្នាជាអ្នកសរសេរព័ត៌មាន ។

នៅក្នុងឱកាសចូលឆ្នាំថ្មី ២០១០ ខាងមុខនេះ យើងគួរត្រៀមឱ្យមានឱកាសជួបជុំគ្នា ជួយរំលឹកគ្នាថាយើងនៅខ្វះខាតអ្វីខ្លះទៀត សម្រាប់ធ្វើនៅឆ្នាំ ក្រោយ ហើយជាពិសេស បើកឱ្យមានឱកាសរីករាយជូនពរគ្នាឱ្យបានម្ដងក្នុងឆ្នាំ ២០០៩ នេះ ។ ជាពិសេស ខ្មែរប៉ុស្តិ៍ ចង់មានឱកាសថ្លែងអំណរអរគុណដល់អស់លោកអ្នកជាអ្នកអាន ជាអតិថិជន ជាពាណិជ្ជករគ្រប់វិស័យ ដែលបានជួយផ្ដត់ផ្គង់ ឧបត្ថម្ភផ្នែកថវិកាបណ្ដាលឱ្យខ្មែរប៉ុស្តិ៍ មានជីវិតរស់រានដ៏ល្អប្រសើរ រហូតមកដល់សព្វថ្ងៃនេះ មុននឹងឆ្នាំ ២០០៩ កន្លងទៅ ៕

សួស្ដី និងសប្បាយរីករាយឆ្នាំថ្មី ២០១០ !

សូមអញ្ជើញជួយជាវ



SUBSCRIBE TO

កាសែតខ្មែរប៉ុស្តិ៍

THE KHMER POST



និងមានជូនរង្វាន់គាប់ចិត្ត

And GET a FREE GIFT !

- ជាវកាសែតនាពេលនេះ លោកអ្នកមានបុព្វសិទ្ធ ពិសេសគឺ
- លោកអ្នកចំណេញពេល ដោយខ្មែរប៉ុស្តិ៍ផ្ញើមកដល់ផ្ទះតែម្ដង
- នឹងទទួលបានព័ត៌មានត្រឹមត្រូវមុនគេ ពីតំបន់លោកអ្នក ឬពីតំបន់ផ្សេងៗ ឬពីកម្ពុជា
- ទាញភ្ជាប់គម្លាតខាងភាសា និងវប្បធម៌នៅក្នុងផ្ទះ ដោយសារមានព័ត៌មានខ្មែរ និងអង់គ្លេសពីក្នុង និងក្រៅប្រទេស
- នឹងទទួលបាននូវចំណេះដឹង គំនិតថ្មី ពីការសិក្សា ពីប្រវត្តិសាស្ត្រ ពីសាសនា ពីនយោបាយ...។ល។
- នឹងទទួលបាននូវរង្វាន់ពីខ្មែរប៉ុស្តិ៍ ដូចជា : សៀវភៅ សំរាប់ក្សាក្នុងបណ្ណាល័យ "ទីក្រុងភ្នំពេញមុនឆ្នាំ១៩៥៤"
- នឹងទទួលនូវប័ណ្ណបញ្ចុះតម្លៃផ្ញើសក់ នៅហាងសំអាតសក់ Perfect Front ទៀតផង ។

Don't Wait. Subscribe Today ! សូមកុំអោយអញ្ជើញចុះឈ្មោះជាវថ្ងៃនេះ !

***Please mail me my FREE Gift and the 1 year subscription of the Khmer Post***

***(24 issues for Only $5.00 per month!)***

*I would like to break the payment into these options:*

$30.00 (6 months) ____ $60.00 (1 year)

ថ្ងៃខែ, Today Date.................................

ឈ្មោះ, Name.................................

អាសយដ្ឋាន, Address.................................

អ៊ីមែល, Email Address.................................

**របៀបបង់ថ្លៃ** Payment method : ☐ Money order Check ☐

**សូមផ្ញើតម្លៃជាវមក** ***Please send your payment to :***

***US-Asia Media Group. 438 Lindley Avenue. Philadelphia, Pa 19120***

សូមផ្ញើមកឲ្យខ្ញុំនូវរង្វាន់ដែលភ្ជាប់នឹងការជាវ "ខ្មែរប៉ុស្តិ៍" ប្រចាំឆ្នាំ (ផ្ញើ២៤លេខ ក្នុងតម្លៃតែ $5/១ខែ)

ខ្ញុំបង់ផ្ញើតម្លៃជាវកាសែតខ្មែរប៉ុស្តិ៍ជា ...$30 (៦ខែ) ឬ ..$60.00 (១ឆ្នាំ)

From :Philadelphia

សួស្ដីឆ្នាំថ្មី



ហាងខ្មែរជួសជុលរថយន្ត

បើចង់ឱ្យរថយន្តលោកអ្នករត់បានល្អ សូមអញ្ជើញ

**Rathe`s Auto Service**




State and Emission Inspection General Repairs and Maintenance

MON-SAT, 8:30AM -5:30PM
SUN. EMERGENCY ONLY

-ជាងមានបទពិសោធន៍ជាយូរឆ្នាំ -ជួសជុលរថយន្តគ្រប់ប្រភេទ
-មានដូរប្រេង ដូរប្រាំង ដូរកង់ និងករណីជាច្រើនទៀត ។
-មានត្រួតពិនិត្យគ្រឿងម៉ាស៊ីន DIAGNOSTICS ដោយឥតគិតថ្លៃ -មានចុះថ្លៃពិសេស ចាប់ពីខែកុម្ភៈ ២០០៨ ទៅ : -ដូរប្រេងក៏រត ៥ ក្វាត $22. - INSPECTIONS រថយន្តឆ្នាំ 96 up $49.99+ ពាក់-មានជូនប័ណ្ណពិសេស សំរាប់ដូរប្រេង ចុះថ្លៃពាក់កណ្ដាល នៅពេលយកមកជួសជុលអស់តម្លៃ $150.
-តម្លៃជួសជុលទូទៅ សមរម្យ ដោយទាបជាងហាងជួសជុលផ្សេងៗទៀត
- ប្ដេជ្ញាចិត្តធ្វើជូនដោយហ្មត់ចត់ គុណភាពខ្ពស់ មិនឱ្យខុសបំណងលោកអ្នកឡើយ ។

ពិសេស ជួយទៅពិនិត្យដល់កន្លែងនូវរថយន្តណាដែលខូច STARTER ឬធុងអាគុយអស់ភ្លើងដោយឥតគិតថ្លៃ ។ *សូមអរគុណ !*

5105 N.2ND ST., PHILADELPHIA, PA 19120. TEL: (215) 329-2418
Fax: (215) 329-2419.Rath CELL: (215) 431-6376




**ដោយ : គឹម ភឿន (តពីលេខមុន)**

...វិរៈសម្លឹងទៅឆាយហាក់ដូចនឹកឃើញរឿងអ្វីមួយក្នុងអតីតកាលក៏ឱទានឡើង "មិនស្មានថាបានជួបបងម្តងទៀតសោះ ហើយជួបគ្នាក្នុងសភាពការណ៍បែបនេះ!" ។

- មានអីមិនល្អអាប្អូន! បានជួបឯងពេលនេះប្រសើរសម្រាប់បងណាស់ បងអាចស្គាល់ឯងថែមទៀតក្នុងបុគ្គលិកលក្ខណៈមួយផ្សេងទៀតរបស់ឯង ឯងក្លាយជាទាហាន ហើយមានភាពជាអ្នកដឹកនាំ បងសប្បាយចិត្តដោយបានស្គាល់ឯង ។ បងចង់ជួយឯងក្នុងរឿងមួយ បើឯងព្រមបងសប្បាយចិត្តនឹងជួយឯងចាប់ពីពេលនេះទៅ ។

- បានបងជួយជាព្រះគុណមហាធន់ហើយ តែបងចង់ជួយប្អូនក្នុងរឿងអីមួយ? ។ លោក អ៊ុំសាវុឍ ញញឹម :

- បងឃើញឯងមានតែលោកតា ដែលគង់នៅវត្តលង្កានោះតែមួយអង្គគត់ ជាបង្គោល ជាញាតិរបស់ឯង វាអាចមានការលំបាកច្រើនសម្រាប់ឯងពេលចូលស្តីដណ្តឹងកូនស្រីចៅហ្វាយ បងធ្វើជាប្រពន្ធនោះ បងចង់សុំធ្វើជា បងធម៌របស់ឯងជាផ្លូវការ ចាប់ពីថ្ងៃនេះតទៅ ដើម្បីជួយឯងដូចជាបងប្រុសបង្កើតម្នាក់របស់ឯង... ដោយញាប់ញ័ររន្ធត់ក្នុងចិត្តខ្លាំង ទឹកភ្នែកហូររឹម១ក្នុងរង្វង់ភ្នែកទាំងពីររបស់ខ្លួន វិរៈ តបដោយសម្លេងញ័រ១ ដាច់១

- លោកបង... ខ្ញុំមិនដឹង... ត្រូវអរគុណបងយ៉ាងណាឱ្យសមទេ នេះជាអំណោយមួយដែលខ្ញុំទើបជួបម្តងគត់ក្នុងមួយជីវិតខ្ញុំនេះ... ។ និយាយចប់ភ្លាម វិរៈលើកដៃទាំងពីរប្រណមដោយក្តីគោរពយ៉ាងជ្រាលជ្រៅបំផុត ។ លោក អ៊ុំសាវុឍ ចាប់ដៃទាំងពីររបស់ វិរៈ ហើយឱបរឹតគ្នាយ៉ាងរំភើបចិត្ត ។ លោក អ៊ុំសាវុឍ សម្លឹងមុខប្អូនប្រុសខ្លួនដោយពេញចិត្ត :

- ណ្ហើយចុះអាប្អូន បងទៅរកជួបអាសំឡាញ់ណៃខុន ផ្តាំផ្ញើរឿងឯងផង និងជួយអាប្អូនខ្មែរក្រហមដែលនឹងត្រូវគេពន្លាត់ស្បែកក្នុងពេលបន្តិចទៀតនេះផង !។

បន្តិចក្រោយមក លោក អ៊ុំសាវុឍ បានចេញមកពីការិយាល័យលោកវរសេនីយ៍ ណៃខុន ក្នុងរថយន្តស៊ីបមួយគ្រឿងបរតម្រង់មកបង្គោលទង់ជាតិ ដែលមានមនុស្សចោមរោមឈរវង់ចាំមើលខ្មែរក្រហមនឹងត្រូវគេពន្លាស់សាច់នោះយ៉ាងអ៊ូអរ ខ្សៀវខ្សា មានទាហានពីរនាក់ឈរស្ពាយកាំភ្លើងចាំយាមកុំឱ្យគេចូលមកក្បៀកនឹងខ្មែរក្រហមកំពុងជាប់ចំណងនោះពេក ។ កូនទាហានម្នាក់ចុះពីថយន្តស៊ីប កាន់លិខិតមួយច្បាប់ចេញពីលោកណៃខុន បង្ហាញទៅទាហានម្នាក់ដែលកំពុងឈរយាម ។ មួយសន្ទុះក្រោយមកទាហានទាំងពីរនាក់បាននាំគ្នាស្រាយចំណងខ្មែរក្រហមនោះពីរដងទង់ជាតិ រួចចងស្លាបសេកវាវិញ ឱ្យកូនទាហានលោក អ៊ុំសាវុឍ បណ្តើរទៅឡើងរថយន្ត ស៊ីបរបស់លោក អ៊ុំសាវុឍតម្រង់ទៅភ្នំពេញ ជាមួយរថយន្តយោធា និងរថពាសដែកបួនប្រាំគ្រឿងទៀត កំពុងចតចាំនៅទីនោះយូរមកស្រាប់ផង ក្រោមក្រសែភ្នែកអស់សង្ឃឹមរបស់មនុស្សមួយចំនួនដែលចង់ឱ្យធ្វើទារុណកម្មលើរូបខ្មែរក្រហមនោះ ឯមួយចំនួនទៀតហាក់ដូចអបអរនឹងការដែលខ្មែរក្រហមរូបនោះបានត្រូវបញ្ជូនទៅថ្នាក់លើដោះស្រាយ ព្រោះគេមិនចង់ឃើញការសងសឹកគ្នាដោយឃោរឃៅព្រៃផ្សៃ និងគ្មានន័យរបៀបនេះ ។

គភ គភ គភ គភ.....

ពីរ ឬបីអាទិត្យក្រោយមក នាពេលម៉ោង៩ព្រឹក ស្រាប់តែមានចៅកែខ្មែរកាត់ចិនម្នាក់ មាឌមាំខ្ពស់ចូលមកក្នុងបន្ទាយ សុំជួបលោកអនុសេនីយ៍ឯក វិរៈ ដោយទឹកមុខស្លេកស្លាំង ។ វិរៈ អញ្ជើញភ្ញៀវឱ្យអង្គុយស្រួលបួលហើយ ទើបរីករាយទៅកាន់ភ្ញៀវ : " លោកអ៊ុំមានការអីបានជាចង់ជួបខ្ញុំ? "។ លោកចៅកែមានទឹកមុខក្រៀមក្រំតបវិញ : "លោកធំ! ជួយខ្ញុំផង... គេចាប់កូនខ្ញុំយកទៅហើយ... កូនប្រុសតែមួយគត់... ផស់ខ្ញុំ !" ។

- លោកអ៊ុំខំឱ្យសប់អារម្មណ៍សិនទៅ ខ្ញុំនឹងខំជួយអ៊ុំឱ្យអស់ពីសមត្ថភាព ទោះរឿងនោះមានការលំបាកយ៉ាងណាក៏ដោយ ។ លោកអ៊ុំនៅភូមិណា ឃុំស្រុកណាដែរ ?

- ខ្ញុំឈ្មោះ ងួន ស្រេង ចៅកែក្រណាត់សំពត់ផង ចៅកែប្រមូលទិញ ស្រូវ អង្ករ សណ្តែក ពោតរងនៅផ្សារ តាំងគោក យើងនេះឯង...

- ឱ! សុំទោសអ៊ុំ ខ្ញុំទើបមកថ្មីមិនទាន់បានស្គាល់មាមីង បងប្អូន គ្រប់គ្នានៅទីនេះទេ អញ្ជើញឱ្យខ្ញុំសុំជំរាបសួរម្តងទៀត! អ៊ុំមានការអី? ច្បាស់ជាសំខាន់ខ្លាំងណាស់ហើយ ហើយបន្ទាន់ទៀតផងមែនទេ? ។ ទឹកមុខគាត់ប្រែជាស្ងប់ស្ងៀមជាធម្មតាឡើងវិញ :

- ច្បាស់ជាអញ្ជឹងហើយលោកធំ! បន្ទាន់ខ្លាំងណាស់ លោកធំជួយខ្ញុំផង ខ្ញុំមានកូនប្រុសតែមួយ ឥឡូវពួកវាចាប់កូនខ្ញុំយកទៅហើយ លោកធំត្រូវជួយខ្ញុំ... *(សូមរង់ចាំអានភាគបន្តនៅលេខក្រោយ)*

# ស្វែងរកការរំដោះតាមមាគ៌ារបស់ព្រះពុទ្ធ

**ដោយ : សុបិន (ភាគ៤)**



***ពិតិចសាស់ :*** នៅពេញមួយថ្ងៃទី៧ នោះខ្ញុំបានសាកល្បងបច្ចេកទេសពិនិត្យសង្ខារា ដោយពុំមានឱ្យសារៈសំខាន់ទៅលើដង្ហើម ដែលជាទម្លាប់ប្រតិកម្មរបស់អារម្មណ៍ខ្ញុំចំពោះសង្ខារានោះ ខ្ញុំសង្កេតឃើញដង្ហើមរបស់ខ្ញុំបានត្រឡប់មករកភាពពេញលេញ រីឯការឈឺចាប់ ដែលបានឡើងច្រើនជាងនាពេលមុន ក៏ថយចុះកម្លាំង និងចំនួន ។

ស្អែកឡើងពេញមួយថ្ងៃទៀត ការអង្គុយភាវនារបស់ខ្ញុំបានប្រព្រឹត្តទៅយ៉ាងស្ងប់ យ៉ាងបរិសុទ្ធ ដោយពុំមានឃើញសង្ខារា ឬការខ្វះខ្យល់អ្វីងើបឡើងមកវិញសោះ អារម្មណ៍ខ្ញុំយល់ថា ខ្ញុំចាប់ផ្តើមធ្វើការពិនិត្យរូបរាងកាយពីក្បាលដល់ចុងជើងចុះឡើងបានប្រសើរជាពេលមុន ។ ពេញមួយថ្ងៃប្រកបដោយសេចក្តីសុខពេញមួយថ្ងៃ ប្រកបដោយអារម្មណ៍ជ្រះថ្លា ធ្វើឱ្យខ្ញុំសន្និដ្ឋានបានថា ទំនងជាជម្ងឺប្រចាំកាយរបស់ខ្ញុំបានចាកចេញពីខ្លួនខ្ញុំទៅហើយ ហើយជាពិសេសនោះគឺខ្ញុំទទួលបាននូវវិជ្ជាផ្លូវចិត្តដ៏សំខាន់មួយថា មើលសង្ខារានោះត្រឡប់មកវិញ ខ្ញុំអាចនឹងមានវិធីព្យាបាលវាដោយខ្លួនឯងបានហើយ ។ សេចក្តីត្រេកអរ និងភាពអរគុណបានផុសឡើង ស្របគ្នានឹង "កម្មវិធីផ្សាយមេត្តាធម៌ដល់សព្វសត្វទាំងពួង" ក៏មកដល់នាព្រឹកថ្ងៃទី ១០ ជាមួយគ្នា ។ ទទួលនូវចំណេះសម្រាប់ជំរះភាពសៅហ្មង ហើយភាពជ្រះថ្លាបានកកើតមកហើយ គ្រូបានណែនាំឱ្យផ្សព្វផ្សាយការអាណិតអាសូរដល់អ្នកដទៃដែលកំពុងប្រយុទ្ធជាមួយភាពសៅហ្មងប្រចាំថ្ងៃឱ្យបានរួចរំដោះពីទុក្ខភ័យថែមទៀត ដោយមិនប្រកាន់ថា មិត្ត ឬជាសត្រូវ និងដោយគ្មានបំណងនឹងទទួលផលណាមួយមកវិញនោះទេ ។ នេះគឺជាចុងបញ្ចប់នៃកម្មវិធី ១០ ថ្ងៃ របស់វិប្បសនាកម្មដ្ឋាន ដែលសិស្សអាចនិយាយរកគ្នាវិញបានរនាំងយាំងបរិវេណស្ត្រី និងបរិវេណប្រុសក៏ត្រូវលើក ធ្វើឱ្យខ្ញុំមានឱកាសនឹងពិគ្រោះជាមួយសិស្សឯទៀត១ ប្តូរបទពិសោធន៍គ្នាយ៉ាងរីករាយ ។ ល្ងាចនេះសិស្សចាស់នាំគ្នាធ្វើទានដោយដាក់ប្រាក់ឧបត្ថម្ភដល់មជ្ឈមណ្ឌលតាមសទ្ធាអនុញ្ញាតឱ្យសិស្សក្រោយ១ អាចមកទទួលព្រះធម៌ដោយសេរីបាន គេមិនទទួលទានដូចគ្នានេះពីសិស្សថ្មីទេ ពីព្រោះការមករៀននេះ ជាសទ្ធារបស់សិស្សចាស់ ។ ខ្ញុំបានលាគ្រូ ប្រធានស្ត្រី លាអ្នកដែលបានធ្វើម្ហូបឱ្យសិស្ស លានាយកមជ្ឈមណ្ឌលប្រកបដោយភាពអរគុណយ៉ាងស្មោះ ចំពោះគុណភាពនៃការ ទទួលឱ្យខ្ញុំអាចទទួលដោយពុំមានកង្វល់អ្វីទាំងអស់បាន ។

នៅតាមផ្លូវអាកាសត្រឡប់ពីតិចសាស់ មកហ្វីឡាដែលហ្វៀ វិញ ខ្ញុំរំលឹកពីភាពអស្ចារ្យ នៃការផ្សាយព្រះធម៌របៀបសម័យ **តទៅទំព័រទី ១៧**

ANGKOR AUTO SERVICE, INC.
ហាងជួសជុលរថយន្ត "អង្គរ"
4835 N. 16th Street. Philadelphia, Pa 19141
Tel : (215) 455-7810
Ricky : (215) 485-1425
Specializing in Body Kit and Custom Paint
ជំនាញខាងជួសជុលតួរថយន្ត
និងបាញ់ថ្នាំដាក់ក្បាច់តាមបំណងភ្ញៀវ
RICKY
មុនពេលជួសជុល
ក្រោយពេលជួសជុល
មានបទពិសោធន៍២០ ឆ្នាំ
ជាជាងរថយន្តមានសញ្ញាប័ត្រ
វាយតម្លៃការងារដោយឥតយកថ្លៃ
ហើយយើងជួយសន្សំប្រាក់តម្លៃ
បន្ថយរបស់អ៊ីនស្វ៊ីរិន បានផង
យើងផ្តល់សេវាគ្រប់យ៉ាង :
-State inspection
-Insurance Claims
-Auto Glass Repairs
-Auto Frame Repairs
-Custom Painting
-Auto A/C
បើកពីម៉ោង ៩ ព្រឹក
ដល់ម៉ោង៥ល្ងាច ពីថ្ងៃ
ចន្ទ ដល់ ថ្ងៃ សៅរ៍
ចុះតម្លៃជូន 10 % បើបង្ហាញប័ណ្ណការណិជ្ជកម្មនេះ

សេចក្តីជូនដំណឹង
យើងខ្ញុំមានទទួល Design ដូចជា :
Design Name Card, Poster, Invitation, Leaflet, Adevertising, Menu & Other
បើលោក លោកស្រីមានបំណងទទួលនូវសេវាកម្មណាមួយ សូមទំនាក់ទំនងមក
យើងខ្ញុំៗ នឹងធ្វើជូនយ៉ាងពេញចិត្ត ។ សុបិន : (267) 253-3947

# ការរំលឹកអំពីការលេបទឹកដីកម្ពុជា ដោយវៀតណាម និងថៃឡង់



•••(សេចក្តីថ្លែងការណ៍ នៃលោក ស៊ាន ប៉េងសែ គណៈកម្មាធិការព្រំដែនកម្ពុជា នៅឱកាសបាតុកម្មនៃ បុណ្យខួបទី១៨ នៃកិច្ចព្រមព្រៀងសន្តិភាពនៃទីក្រុង ប៉ារីស ស្តីពីកម្ពុជា (នៅទីលានសិទ្ធិមនុស្ស ក្រុងប៉ារីស ប្រទេសបារាំង ថ្ងៃទី ២៥ តុលា ២០០៩)

សូមថ្វាយបង្គំព្រះសង្ឃគ្រប់ព្រះអង្គ ជាទីគោរពបូជា

សូមជម្រាបបងប្អូន និងមិត្តទាំងអស់ដោយគោរព

យើងបានដឹងគ្រប់គ្នាហើយថា នៅរាល់ពេលទាំងអស់ ក្នុងប្រវត្តិសាស្ត្រ កងទ័ពយួនដែលចូលមកក្នុងប្រទេសកម្ពុជា តែងតែកាន់កាប់ស្រុកទេសយើង និងកាន់កាប់យកដីយើង ដើម្បីពង្រីងអាណាចក្រយួន ។ នៅឆ្នាំ ១៩៧៩ គ្រាន់តែបានកាន់កាប់កម្ពុជា ៤-៥ សប្តាហ៍ វៀតណាមកុម្មុយនីស្ត បានឱ្យខ្មែរ ដែលចុះចូលនឹងខ្លួនទទួលយកសន្ធិសញ្ញានៃអាណាព្យាបាលយួន ចុះថ្ងៃទី ១៨ កុម្ភៈ ១៩៧៩ គឺឱ្យទទួលស្គាល់នូវការត្រួតត្រាដាច់ខាតរបស់គេ នៅគ្រប់ទិសទីនៅកម្ពុជា ។ ភ្លាម១នោះទៀត រាល់១ថ្ងៃ ពួកនិគមយួនរាប់ពាន់នាក់ បានសំរុកចូលមកតាំងទីលំនៅក្នុងកម្ពុជា នៅកន្លែងសម្បូរណ៏ភោគផលនៃខេត្តខាងកើត ហួតដល់ក្រុងភ្នំពេញ តាមមាត់ទន្លេមេគង្គ និងទន្លេសាប ។ សព្វថ្ងៃនេះ ពួកអាណានិគមយួន ជាច្រើនលាននាក់ ដោយមាន "សមាគម" គេ ជួយការពារសិទ្ធិរបស់គេ មាននៅគ្រប់ខេត្តឯទៀត១ នៅកណ្តាលប្រទេស នៅខាងជើង និងខាងលិចទាំងអស់ ។

បន្ទាប់ភ្លាមមកទៀត គេធ្វើសន្ធិសញ្ញាឱ្យកម្ពុជា ទទួលស្គាល់ការកាត់យកជាស្រេចនូវទឹកដីខ្មែរ ជាអាទិ៍គឺ :

- សន្ធិសញ្ញានៃថ្ងៃទី៧ម កក្កដា ១៩៨២ អំពីការ កាត់យកកោះត្រល់ (យួនហៅ "ភូកុក") នៅក្រុងកោះ ត្រចកសេះ (ពូឡូប៉ូយ៉ាង) ព្រមទាំងដែនសមុទ្រ ៣០.០០០គម២ នៃខ្ពង់រាបបាតសមុទ្រកម្ពុជា ។

- សន្ធិសញ្ញានាឆ្នាំ ១៩៨៣ និង ១៩៨៥ នៃ "ការកំណត់ព្រំដែនដីគោក វៀតណាម-កម្ពុជា" ដើម្បីទទួលស្គាល់ការកាត់យកដីខ្មែរ ជាច្រើនកន្លែង ចាប់ពីខេត្តរតនៈគីរី មណ្ឌលគីរី កំពង់ចាម រហូតដល់ខេត្តកំពត ដែលមានទំហំរួមប្រមាណ ៥.០០០គម២ ។ ការកាត់យកទឹកដីខ្មែរ ដោយយួននេះ ត្រូវបានព្រះរាជាណាចក្រ "ថ្មី" នៃកម្ពុជា ទទួលស្គាល់ក្នុង "សន្ធិសញ្ញាបំពេញបន្ថែម..." ចុះថ្ងៃទី១០ តុលា ២០០៥ ដោយបំពាន ដោយចេតនា លើកិច្ចព្រមព្រៀងក្រុងប៉ារីស ស្តីពីកម្ពុជា ឆ្នាំ១៩៩១ តែម្តង ។ យើងនឹងដឹងច្បាស់ថា យួនបាន កាត់យកទឹកដីខ្មែរប៉ុន្មាននោះ ឱ្យប្រើការជាសាធារណៈ ។

នៅខាងលិចវិញ សៀមបានកាន់កាប់តំបន់ប្រាសាទព្រះវិហារ ប្រាសាទតាមាន់ ប្រាសាទតាក្របី មិនមែនចាប់ពីថ្ងៃទី១៥ កក្កដា ២០០៨ ទេ គឺតាំងពីឆ្នាំ ១៩៩៩ បន្ទាប់ពីទ័ពចុងក្រោយរបស់មេខ្មែរក្រហម តាម៉ុក បាន ព្រមចុះចូលមកខាង ហ៊ុន សែន និងក្រោយពីគេចាប់ តាម៉ុក បាននៅស្រុកសៀម ។

ដោយពិតជាបានឃើញអំពើយួន លើទឹកដីខ្មែរ សៀមក៏បានបង្ខិតបង្គោលព្រំដែន ចូលមកខាងក្នុងកម្ពុជា ពី២ទៅ១០គម នៅជាច្រើនកន្លែង ក្នុងខេត្តប៉ៃលិន ខេត្តបន្ទាយមានជ័យ (នៅភ្នំឆ័ត្រ ទងចាន់ អូរបីជាន់ អង្គសីមា) និងខេត្តឧត្តមានជ័យ (ជាអាទិ អូរស្មាច់ ដែលជារបស់ខ្មែរ នៅមុនឆ្នាំ ១៩៩៧) ។ អំពើរបស់សៀមទាំងនេះ ត្រូវបានរដ្ឋាភិបាល ហ៊ុន សែន ដឹងជានិច្ច តាមរបាយការណ៏នៃអាជ្ញាធរនៅផ្ទាល់ទីកន្លែង តាមរយៈអ្នកសារព័ត៌មាន និងតាមរយៈសង្គមស៊ីវិល តែរដ្ឋាភិបាល ហ៊ុន សែន គ្មានរសើបរមាស់អ្វីទេ ។ លោក ហ៊ុន សែន ក៏បានដឹងទៀត តាមការប្រកាសនៃរដ្ឋាភិបាលសៀមថា សៀមបានកាត់យកហើយនូវតំបន់នានានៃជំរុំសឹករបស់អតីតយោធិរុតស៊ូទល់នឹងវៀតណាម (គឺរណសិរ្សជាតិ រំដោះប្រជាជនខ្មែរ និងរណសិរ្សហ៊្វុនស៊ិនប៉ិច) ព្រមទាំងអតីតជំរុំនានានៃជនភៀសខ្លួនខ្មែរ នាសម័យនោះ ដែលសុទ្ធតែនៅក្នុងទឹកដីកម្ពុជាទាំងអស់ ។

នៅខាងសមុទ្រវិញ ថៃឡង់ បានកំណត់ព្រំដែនថ្មីរបស់គេ ជាមួយវៀតណាម នៅថ្ងៃទី ១១ សីហា ១៩៩៧ ដោយបានកាត់យកដែនសមុទ្រទំហំប្រហែល ៣០.០០០គម២ នៃខ្ពង់រាបបាតសមុទ្រខ្មែរ (ភាគខាង លិច) ។ ប៉ុន្តែដោយពិតជាគាត់គោរពដល់ "បងវៀតណាម" របស់គាត់ ទើបលោក ហ៊ុន សែន មិនជំទាស់នឹងការបំពានលើខ្មែរ ពីថ្ងៃនេះទេ ហើយបែរជានិយាយថា ដែលសមុទ្រនេះជា "តំបន់ស៊ុត្ញា" ដែលគាត់នឹងរកស៊ីចែកជាមួយនឹងមិត្តសៀម របស់គាត់ ។

តើសៀមក្តី យួនក្តី ដែលបានចែកអ្វីជាមួយនឹងខ្មែរ ក្រៅពីអ្នកទាំងពីរហ្នឹង ចង់យកស្រុកខ្មែរចែកគ្នា ដូចកាលពី១៥០ឆ្នាំមុននោះ ?

នេះហើយផលវិបាកដ៏រន្ធត់ចំពោះខ្មែរ នៃការរំលោភលើកិច្ចព្រមព្រៀងក្រុងប៉ារីស ឆ្នាំ ១៩៩១ ស្តីពីកម្ពុជា ដោយរដ្ឋាភិបាល ហ៊ុន សែន និងរដ្ឋាភិបាលវៀតណាម និងថៃឡង់ផង ។

តទៅទំព័រទី ១៧

Ontime staffing
HireSatisfaction™

បុគ្គលិកទាន់ពេល
ជ្រើសរើសយ៉ាងពេញចិត្ត

POSITION AVAILABLE
នៅមានកន្លែងធ្វើការទំនេរ

PACKING — ការងារវេចខ្ចប់
WAREHOUSE — ការងារក្នុងឃ្លាំង
MANUFACTURING — ការងារផលិត
MACHINE OPERATORS — ការងារបញ្ជាម៉ាស៊ីន
ASSEMBLY — ការងារផ្គុំគ្រឿង
GENERAL LABOR — ការងារពលកម្មទូទៅ

COME IN AND APPLY TODAY
សូមអញ្ជើញមកដាក់ពាក្យសុំធ្វើការថ្ងៃនេះ

"Missa Bay" ជាក្រុមហ៊ុននាំមុខគេខាងម្ហូបអាហារ និងបន្លែស្រស់ នៅ ស.រ.អា ឥឡូវនេះ កំពុងរកអ្នកធ្វើការ៤០នាក់ ដើម្បីរៀបចំម្ហូប មិនចាំបាច់មានបទពិសោធន៍ ឬចំណេះខាងភាសាអង់គ្លេស ធ្វើការក្នុងបរិយាកាសសីតុណ្ហភាព ៤០°F ស្អាត ។ កំរៃផ្តើមពី ៨.៥ដុល្លារ ក្នុង១ម៉ោង កំរៃធ្វើលើសម៉ោង ១២.៧៥ ដុល្លារ ក្នុងមួយម៉ោង ធ្វើការលើស ៤០ ម៉ោង ក្នុងមួយអាទិត្យ ក្រុមហ៊ុនមានរថយន្តដឹកជញ្ជូនទៅកន្លែងធ្វើការ

**យើងទទួលពាក្យសុំធ្វើការនៅពីកន្លែងហើយគឺ :**

CHINATOWN: 207 N. 9TH STREET. PHILADELPHIA, PA 19107
TEL: 215-829-0188 (MON-FRIDAY)
9:00-5:00 P.M.
215-880-2724 (Sat & Sunday)
SOUTH PHILLY: 529 WASHINGTON AVE., PHILADELPHIA, PA
**សូមសួររក : ចាន់ សុម៉ាលី**
TEL: 267-608-0742 / 215-462-3508 (MON-FRIDAY)
267-238 2388 (Sat& Sunday)
OnTime Staffing, LLC

ឌឹ ខេមបូឌា ដេលី
The Cambodia Daily

ជំណឹងប្រែសំរួលពីភាសាអង់គ្លេស អត្ថបទបានអនុញ្ញាតិឱ្យធ្វើការចុះផ្សាយដោយ ឌឹ ខេមបូឌា ដេលី ច្បាប់ចេញផ្សាយថ្ងៃសុក្រ ទី២០ ខែវិច្ឆិកា ឆ្នាំ២០០៩

# Rainsy says Gov´t Ignores Vietnamese Encroachment

The Cambodia government is purposefully ignoring alleged encroachment be Vietnam on Cambodian soil while exaggeration its territorial disputes with Thailand, SRP President Sam Rainsy said in a statement yesterday. "Our present government foreign policy is totally biased when it comes to defending Cambodia territorial integrity." the opposition lawmaker wrote. "According to the prime minister [Hun Sen], the danger of Cambodia's losing portion of her territory is looming on our western border with Thailand. But he forgets to say that this danger is already and actually materializing on a large scale on our eaters border with Vietnam."



Council of Ministers Spokesman Phay Siphan said by telephone that Mr Rainsy´s comments were racist and that the government work to coexist peacefully with all its neighbors. "Sam Rainsy incites people against neighboring countries," Mr Siphan said. Spokesman for the Vietnamese Embassy in Phnom Penh Trinh Ba Cam brushed aside question on Mr Rainsy´s comments. "This opposition party always dose that so there is no need to comment," he said.

*(Frank Radosevich and James Welsh)*

# លោក សម រង្ស៊ី និយាយថា រដ្ឋាភិបាលធ្វើមិនដឹងមិនឮចំពោះបញ្ហាព្រំដែនវៀតណាម

**ដោយ :** FRENK RADOSEVICK **និង** JAMES WELSH

THE CAMBODIA DAILY

លោក សម រង្ស៊ី ប្រធានគណបក្ស សម រង្ស៊ី បានលើកឡើងនៅក្នុងសេចក្តីថ្លែងការណ៍មួយកាល ពីម្សិលមិញថា រដ្ឋាភិបាលកម្ពុជា កំពុងធ្វើមិនដឹងមិនឮដោយចេតនាចំពោះការទន្ទ្រានចូល ដែលត្រូវបានគេចោទដោយវៀតណាម មកលើទឹកដីកម្ពុជានៅពេលដែលកំពុងបំផ្លើសអំពីជម្លោះទឹកដីរបស់ខ្លួនជាមួយប្រទេសថៃ ។ សមាជិកសភាគណបក្សប្រឆាំងរូបនេះ បានសរសេរថា "គោលនយោបាយបរទេសរបស់រដ្ឋាភិបាលបច្ចុប្បន្នរបស់យើង គឺលំអៀងទាំងស្រុង ពាក់ព័ន្ធនឹងការការពារបូរណភាពទឹកដីរបស់កម្ពុជា" ។ យោងតាមលោកនាយករដ្ឋមន្ត្រី ហ៊ុន សែន គ្រោះថ្នាក់នៃការបាត់បង់ផ្នែកណាមួយនៃទឹកដីរបស់កម្ពុជា កំពុងលិចឡើងបន្តិចម្តងៗមកលើព្រំដែនភាគខាងលិចជាមួយប្រទេសថៃ ។ ប៉ុន្តែលោកភ្លេចនិយាយថា គ្រោះថ្នាក់នេះ មានរួចហើយ ហើយពិតកំពុងរីកធំឡើងៗនៅតាមព្រំដែនភាគកើតរបស់យើងជាមួយវៀតណាម" ។ លោក ផៃ ស៊ីផាន អ្នកនាំពាក្យទីស្តីការគណៈរដ្ឋមន្ត្រី បានថ្លែងតាមទូរស័ព្ទថា ការអត្ថាធិប្បាយរបស់លោក សម រង្ស៊ី មានលក្ខណៈប្រកាន់ពូជសាសន៍ ហើយថារដ្ឋាភិបាលធ្វើការរួមគ្នាដោយសន្តិវិធីជាមួយប្រទេសជិតខាងរបស់ខ្លួនទាំងអស់ ។ លោក ផៃ ស៊ីផាន បានថ្លែងថា "លោក សម រង្ស៊ី ញុះញង់ឱ្យប្រជាជនប្រឆាំងប្រទេសជិតខាង" ។ លោក ទ្រិញ បាកាំ អ្នកនាំពាក្យស្ថានទូតវៀតណាម ប្រចាំទីក្រុងភ្នំពេញ មិនខ្វល់ពីសំណួរអំពីសំដីរបស់ លោក សម រង្ស៊ី ឡើយ ដោយនិយាយថា សំដីទាំងនេះ គឺជាសារទុក្ខធម្មតារបស់គណបក្ស សម រង្ស៊ី ទៅហើយ ។ លោក បាន និយាយថា គណបក្សប្រឆាំងនេះ តែងតែនិយាយអញ្ចឹង ដូច្នេះមិនបាច់ធ្វើអត្ថាធិប្បាយទេ" ៕

# Pig Farmers Raise Beef about Imports

***By Lor Chandara***

***THE CAMBODIA DAILY***

From Takeo Province to Kongpong Cham province, Cambodia's pig farmers say they are reducing their stocks-even abandoning the business altogether-in the wake of an influx of imports that have been driving local pork prices down.

Pig imports from neighboring countries, and Thailand in particular, are making it ever harder for local producers to compete in their own market, said Srun Pov, first deputy president of the Cambodian Pig Raisers Association. Unless the government takes measures to help local producers, he warned, the industry will continue to suffer.

"I want the Ministry of Agriculture to heed this issue, otherwise animal husbandry, and pig husbandry especially, in Cambodia will be affected, and farmers will stop raising pigs," Mr Pov said.

The government imposed a ban on Thai and Vietnamese pig imports in August 2007, both to help develop the country's pig farming sector and to protect consumers from an outbreak of foot-and-mouth disease. It lifted the ban seven months later, however, claiming that a supply shortage had driven consumer prices too high.

*Countinued on page 08*

# កសិករចិញ្ចឹមជ្រូកត្អូញត្អែរអំពីការនាំជ្រូកចូលពីប្រទេសជិតខាង

**ដោយ : ឡោ ចាន់ដារ៉ា**

THE CAMBODIA DAILY

កសិករចិញ្ចឹមជ្រូកនៅកម្ពុជា ចាប់ពីខេត្តតាកែវ រហូតដល់ខេត្តកំពង់ចាម និយាយថា ពួកគាត់កំពុងកាត់បន្ថយចំនួនជ្រូករបស់ពួកគាត់ (ស្ទើរតែបោះបង់អាជីវកម្មនេះទាំងអស់) បន្ទាប់ពីមានការនាំចូលដ៏ច្រើន ដែលបាននិងកំពុងធ្វើឱ្យតម្លៃជ្រូកក្នុងស្រុកធ្លាក់ចុះ ។

លោក ស្រ៊ុន ពៅ អនុប្រធានទី១ នៃសមាគមអ្នកចិញ្ចឹមជ្រូកកម្ពុជា បាននិយាយថា ការនាំជ្រូកចូលពីប្រទេសជិតខាង ជាពិសេស ពីប្រទេសថៃ កំពុងធ្វើឱ្យកាន់តែមានការលំបាកសម្រាប់អ្នកចិញ្ចឹមជ្រូកក្នុងស្រុក ក្នុងការប្រកួតប្រជែងនៅក្នុងទីផ្សាររបស់ខ្លួន ។ លោកបានរំឭកថា បើរដ្ឋាភិបាលមិនចាត់វិធានការជួយអ្នកចិញ្ចឹមក្នុងស្រុកទេ ឧស្សាហកម្មនេះនឹងបន្តរងគ្រោះ ។

លោក ពៅ បាននិយាយថា "ខ្ញុំចង់ឱ្យក្រសួងកសិកម្មយកចិត្តទុកដាក់ចំពោះបញ្ហានេះ បើមិនដូច្នេះទេ **តទៅទំព័រទី ១៣**

ភោជនីយដ្ឋាន ណាម វ៉ាង (ភ្នំពេញ)
Nam Vang Restaurant
571 Unit # 1 Adams Avenue. Philadelphia, Pa 19120
(inside Hong Kong Market) **(215) 742-9488**
Open 7 days a week from 9 a.m. – 9 p.m.
**បើក 7 ថ្ងៃក្នុងមួយអាទិត្យពីម៉ោង 9 ព្រឹក ដល់ 9 ល្ងាច**

**១_មុខជំនាញខាងម្ហូបខ្មែរយ៉ាងចំណាន ដូចជា:**
- គុយទាវភ្នំពេញ
- គុយទាវ ឬមី-ខគោ
- មីកន្ថាំង ឆាសាច់គោ
- មីកន្ថាំងឆាគ្រឿងសមុទ្រ
- បាយឆាគ្រប់មុខ
- សាច់គោអាំង ចង្កាក់ ជាមួយជ្រក់ល្ហុង

**២_មុខជំនាញម្ហូបវៀតណាម ល្បីឈ្មោះឆ្ងាញ់ ដូចជា:**
- នំបញ្ចុកទឹកត្រីពិសេស
- នំប៉ុងបាតេ ឬសាច់គោអាំង
- ខគោ នំប៉័ង ឬមី និងគុយទាវ
- បាយសរសាច់ជ្រូកអាំង ឬសាច់មាន់អាំង

រៀងរាល់ថ្ងៃលោកអ្នកអាចពិសាទឹកក្រឡុកគ្រប់សេជាតិផ្លែឈើ ដូចជា : ទុរេន ឬ អាវូកាដូ ហើយជាពិសេស មានទឹកអំពៅកិនស្រស់ៗ

# "កាវី" ជាភោជនីយដ្ឋានខ្មែរ ខ្នាតមធ្យមដំបូង នៅហ្វីឡាដែលហ្វៀ







**ដោយ : ពិន សំខុន**

**ហ្វីឡាដែលហ្វៀ** : ភោជនីយដ្ឋានខ្មែរខ្នាតមធ្យមដំបូងបង្អស់ បានសម្ពោធសកម្មភាពរបស់ខ្លួន កាលពីថ្ងៃទី ១៤ វិច្ឆិកា ឆ្នាំ ២០០៩ កន្លងទៅនៅផ្នែកខាងត្បូង នៃទីក្រុងហ្វីឡាដែលហ្វៀ។

ភ្ញៀវប្រមាណ ២០០នាក់ បានអញ្ជើញមកអបអរសាទរភ្លក់នូវមុខម្ហូបខ្មែរ តាមសេចក្តីអញ្ជើញរបស់ " កាវី " ម្ចាស់ភោជនីយដ្ឋានស្ថិតនៅជ្រុងផ្លូវ លេខ ៣ និង អូរ៉េគ្កាន់ តំបន់ពាណិជ្ជកម្ម មានទីធ្លាធំទូលាយ ដែលជា "ភោជនីយដ្ឋានកាវី" សរសេរជាអក្សរខ្មែរឈរយ៉ាងសង្ហារក្បែរប៉ាយ ពាណិជ្ជកម្មចិន-យួនធំៗ ឯទៀតៗ រកស៊ីក្បែរៗគ្នា។ នារាត្រីនោះ ភ្លេងរបស់ក្រុមតន្ត្រី "វ៉ាយោ" បានបំពេរកំដរភ្ញៀវនៅលើឆាកជាមួយខ្មែរ និងបរទេសយ៉ាងរង់ រួមគ្នានឹងមិត្តភ័ក្រ "កាវី" ជាសិល្បករភ្លេងបួនក្រុមទៀត ញុាំងឱ្យពិធីភ្លក់ម្ហូបខ្មែរថ្ងៃដំបូងនេះ ក្លាយជាអធិកអធមពន់ពេក។ គេអាចប្រៀបប្រដូចភោជនីយដ្ឋានមួយនេះ ទៅនឹងភោជនីយដ្ឋានខ្មែរធំៗ មួយចំនួននៅឡុងប៊ិចរដ្ឋ កាលីហ្វ័រនីញ៉ា ជាដំបូងបង្អស់ សម្រាប់ជាមោទនភាពរបស់សហគមន៍ខ្មែរ នៅហ្វីឡា-ដែលហ្វៀ ដែលមានហាងខ្មែរធំទូលាយនឹងគេដែរ ។







សហគមន៍ខ្មែរមកដល់ហ្វីឡាដែល-ហ្វៀ ជាង ៣០ ឆ្នាំហើយ ចំនួនក៏បានច្រើនការងារក៏មានធ្វើ តែពុំមានភោជនីយដ្ឋានកិរិតធំ ឬមធ្យមនៅឡើយទេ គេនាំគ្នាធ្វើពិធីជប់លៀង

ឬការកូនចៅនៅហាងចិន ឬ យួន ស្ទើរតែរៀងរាល់អាទិត្យ ពីព្រោះហាងខ្មែរមានទំហំតូចពេកពុំអាចដាក់ភ្ញៀវលើសពី ៥០ នាក់បានទេ ហើយក៏ពុំមានភោជនីយដ្ឋាន ដែលហ៊ានយកម្ហូបខ្មែរ

**តទៅទំព័រទី ១៧**

ជួយគ្នា ទៅវិញ ទៅមក

Give and Take

NATIONAL CAMBODIA AMERICAN
TOWN HALL MEETING

មហាសន្និបាតជាតិ នៃពលរដ្ឋខ្មែរ អាមេរិកាំង

យើងសូមអំពាវនាវដល់លោកអ្នកសមាជិកសហគមន៍ខ្មែរទាំងអស់ព្រមទាំងអ្នកជំនាញការនិងអ្នកផ្តល់នូវការថែរក្សាសុខភាពអញ្ជើញមកចូលរួមនៅមហាសន្និបាត ពិសេសនេះ ដែលស្តីពីការដោះស្រាយការព្យាបាលជំងឺ ទឹកនោមផ្អែមនិងគ្រោះថ្នាក់នៃ ជំងឺស្លាប់ដៃ ស្លាប់ជើង ស្លាប់មួយចំហៀងខ្លួន ។

ធ្វើនៅ ខែ ធ្នូ ថ្ងៃទី ២ ឆ្នាំ ២០០៩

1:00 PM to 4:00 PM

Cambodian Association of Greater Philadelphia
5412 North 5th Street Philadelphia, PA 19120

ព័ត៌មានបន្ថែមសូមអញ្ជើញ
ទាក់ទងតាមលេខ 1(215) 324-4070

# A.B.C MONEY TRANSACTION, INC

# $ ក្រុមហ៊ុនផ្ញើប្រាក់ A.B.C



## តម្លៃសំរាប់ផ្ញើទៅស្រុកខ្មែរ



| | | ភ្នំពេញ | តាមខេត្ត |
|---|---|---|---|
| ផ្ញើ $100 | យកកម្រៃ | $4.50 | $5.50 |
| $200 | យកកម្រៃ | $9.00 | $11.00 |
| $300 | យកកម្រៃ | $13.50 | $16.50 |
| $500 | យកកម្រៃ | $16.00 | $17.00 |
| $1000 | យកកម្រៃ | $25.00 | $26.00 |
| $1500 | យកកម្រៃ | $35.00 | $36.00 |
| $2000 | យកកម្រៃ | $42.00 | $43.00 |
| $2200 | យកកម្រៃ | $46.00 | $47.00 |

សូមកុំភ្លេចទាក់ទងការិយាល័យក្រុមហ៊ុន ABC ដែលនៅជិតលោកអ្នក ប្រសិនបើមានបំណងចង់ផ្ញើប្រាក់ទៅស្រុកខ្មែរ ឬក៏ទូរស័ព្ទមកយើងតាម

### នៅរដ្ឋ VIRGINIA សូមទាក់ទង

**ABC MONEY TRANSATION ,INC.**

8 locations to serve you in Virginia

- 6757 Willson Blvd.-Ste.#25 Tel : 703.534.2600
- 4291 Holland Rd-Ste.#111 Tel : 757.474.9400
- 10428 Ridgefield Pkwy Tel : 804-740-2454
- 2519 W . Mercury Blvd . Tel : 757.265.6305
- 23520 Overland Dr. Tel : 703.661.6666
- 6314 Rigsby Rd. Tel : 804.288.2988
- 7252 Arlingston Blvd . Tel : 703.641.0778
- 6217 W. Broad St. Tel : 804.288.6988

**ARIZONA**
- 4215 N 19th Ave. . Tel : 602.266.6744

**GEOERGIA**
- 4897 Buford Hwy. Ste. 202. Tel: 770.457.7888

**ILLINOIS**
- 4871 N. Broadway . Tel :773.989.7332

**MASSACHUSETTE**
- 996 Dorchester Ave. Tel:617.825.9380
- 1365-1377 Dorchester Ave. -Ste.4,Froor 1 .Tel : 617.265.4600

**MINNESOTA**
- 2718 Nicollet Ave . S.- Ste. 102 B
- Tel : 612.871.4731
- 6350 Brooklyn Blvd . Tel : 763.503.3947

**NORTH CAROLINA**
- 3000 Central Ave. Ste . #9 . Tel : 704-532-4420

**OREGON**
- 6908 N.E. Sandy Blvd . Tel : 503.281.8088

**PHILADFELPHIA**
- 5520 . Whitaker Ave. -Unit 2 . Tel : 215.831.9794
- 571 Adams Ave . Ave.#4 . Tel : 215.342.6623

**TEXAS**
- 1818 E . Pioneer Pkwy. Ste.156 . Tel : 317.461.1461
- 2615 W . Pioneer Pkwy. Ste.136 . Tel : 214.788.2817
- 5302 E . Belknap St.- Ste.D6 . Tel : 817.831.4836
- 3538 W . Walnut St. Tel : 972.272.2253
- 11205 Bellaire Blvd . Tel : 281.561.6600
- 10909 Scarsdale Blvd . Tel : 281.481.2700
- 13480 Veterans Memorial Dr.-Ste. F2. Tel: 281.587.0807

**WASHINTON STATE**
- 766 S.38th St,. Tel : 253.475.2847
- 3818 S.Graham St.-Ste. C Tel : 206.721.2070

## ក្រុមហ៊ុនទទួលផ្ញើប្រាក់ទៅកម្ពុជា

ABC ជាក្រុមហ៊ុនផ្ញើប្រាក់តែមួយគត់នៅស្រុកខ្មែរ ដែលមានការប្រគល់ប្រាក់ដល់ផ្ទះ

- ស្របច្បាប់
- រហ័សទាន់ចិត្ត
- ធានារ៉ាប់រង និងជូនប្រាក់ទៅដល់ផ្ទះ
- កំរៃផ្ញើថោកជាងកន្លែងដទៃ

### ក្រៅពីការផ្ញើប្រាក់ក្រុមហ៊ុនមានលក់

PHONE CARD និង PINLESS សំរាប់ទូរស័ព្ទទៅស្រុកខ្មែរ ដែលផលិតដោយក្រុមហ៊ុន ABC ផ្ទាល់ មានគុណភាពល្អ ហើយជាពិសេស CARD របស់យើងនឹងទុកបានរហូត មិនអស់កំណត់កាលឡើយ ( NEVER EXPIRED) ។

ត្រូវការអ្នកសហការ (AGENTS ) ជាមួយយើងទូទាំងសហរដ្ឋអាមេរិក និងបានទទួលប្រាក់ចំណូលយ៉ាងខ្ពស់ !

ព័ត៌មានបន្ថែមសូមទាក់ទង CHET THACTHER តាមទូរស័ព្ទ និងអាស័យដ្ឋានខាងក្រោម :

Office : 714-590-8740 Fax : 714-590-8776
Cell: 714-603-3509 Toll Free : 1-877-939-0110

ABC MONEY TRANSATION, INC
12019 Garden Grove Blvd., Ste.#204
Garden Grove , CA 92843
chesterthatcher@yahoo.com

(តមកពីទំព័រទី ០១) **ពលរដ្ឋខ្មែរនៅផែនស៊ីវេនា...**

ទុកដាក់ដ៏ចំឡែក ចំពោះកម្មវិធីដ៏វិសេស និងតែម្តង រៀបចំជូនដោយសារព័ត៌មានខ្មែរប៉ុស្តិ៍ ឆ្នេរខាងកើត ដោយសហគមន៍ខ្មែរ និងសមាគមព្យាបាលជម្ងឺផ្លូវចិត្ត MHASP ។ លោកស្រីបណ្ឌិត លក្ខិណា នូ ខាងផ្នែក អញ្ជើញឱ្យឆ្លើយសំនួរតុលាការហើយ គឺមានជាអាទិ៍ : លោក ជា ស៊ីម . គៀត ឆុន និង ហេង សំរិន ។ល។ តែពុំទាន់មានការចោទប្រកាន់នៅឡើយ... តើថ្ងៃក្រោយទៅនឹងមានឈ្មោះ ប៉ុន្មាននាក់ទៀតចូលមក ចូលរួមដោយក្រុមអ្នកគាំទ្រគ្រួសារខ្មែរ បានរៀបចំទទួលភ្ញៀវយ៉ាងត្រចះត្រចង់ ក្នុងបរិវេណដែលមានរូបចម្លាក់ និងផ្ទាំងគំនូរបុរាណខ្មែររាប់រយនៅទីនោះ ។ ភ្ញៀវឆ្ងាយជិតមិនភ្លេចនឹងកោតសរសើរនូវសម្បត្តិមនុស្ស និងសម្បត្តិវប្បធម៌របស់ ហ្វីឡាដែលហ្វីយ៉ា មិនដាច់ពីមាត់សោះឡើយ ។







ចិត្តវិជ្ជា លោកស្រីមេធាវី អជ្រៃ និង ជូលី បានបង្ហាញពីការស្រាវជ្រាវចិត្តសាស្ត្រទាក់ទងនឹងសុខភាពរបស់សហគមន៍ខ្មែរ ហើយនឹងយន្តការនៃការដាក់ពាក្យបណ្តឹងទៅតុលាការជំរះក្តីចំពោះមេខ្មែរក្រហមចំនួន ៤ នាក់ គឺ អៀង សារី . អៀង ធីរិទ្ធ . ខៀវ សំផន និង នួន ជា ព្រមទាំងមានការឆ្លើយសំនួនដ៏ច្រើន ហើយស្អុតស្អាញផង ។ ចំណុចពីរដែលរំខានបេក្ខជនដើមបណ្តឹងដោយមិនដាច់ចិត្តបណ្តឹង គឺការសង្ស័យទៅលើតុលាការនៅក្នុងប្រទេសកម្ពុជា ថាពុំអាចរកយុត្តិធម៌ឱ្យនរណាម្នាក់បាន ហើយមួយទៀត ការប្តឹងទៅលើអ្នកទាំង ៤-៥នាក់នោះ មិនគ្រាន់ដោយអ្នកដែលជឿថា ដើមហេតុនៃការសម្លាប់លើក្រុមគ្រួសារគេឯទៀតៗនោះ នៅរស់ ហើយមានបុណ្យស័ក្តិធំនៅឡើយ ។ លោកស្រីមេធាវី បានផ្តល់យោបល់ថា "ថ្វីត្បិតតែគេពុំអាចដាក់ពាក្យប្តឹងទៅអ្នកឯទៀតៗបានក៏នៅក្នុងបែបបទនោះ គេអាចចង្អុលឈ្មោះអ្នកឯទៀតដែលបានចូលរួមឧក្រិដ្ឋកម្មពេលនោះបានដែរ ក្នុងពេលនេះ មានឈ្មោះសាក្សី ៦ នាក់ទៀត បានត្រូវឆ្លើយសំនួរចៅក្រមអន្តរជាតិនោះ ខ្ញុំក៏ពុំអាចទាយបានដែរ " តែយ៉ាងណាក៏ដោយ ព្រះនាមសម្តេច សីហនុ និង ឈ្មោះលោក ហ៊ុន សែន បានត្រូវអ្នកសួរលើកមកចោទជាបញ្ហាច្រើនផង ។ បន្ទាប់ពីបានយល់អំពីវិធីដាក់ពាក្យបណ្តឹងរួចហើយ បណ្ឌិតលក្ខិណា នូ បានអញ្ជើញមេធាវី និងអ្នកស្ម័គ្រចិត្តប្រមាណ ១០ នាក់ មកពីក្រៅចូលរួម ដោយអ្នកបកប្រែភាសាប្រមាណ ៦-៧នាក់ នៅហ្វីឡាដែលហ្វៀ អ្នកដើមបណ្តឹងនៅក្រៅប្រទេសប្រមាណជិត ៤០ នាក់ មានស្ត្រី និងបុរសបានបំពេញករណីកិច្ចលើកបញ្ហាទារុណកម្មដ៏ឧក្រិដ្ឋនាឱកាសខ្មែរក្រហមគ្រប់គ្រង មកទាមទារឱ្យរកយុត្តិធម៌ដល់ខ្លួន និងក្រុមគ្រួសារម្នាក់ម្តងៗ រហូតដល់ចប់សព្វគ្រប់នាយប់ថ្ងៃសៅរ៍ ។

នាចន្លោះថ្ងៃសុក្រ និងថ្ងៃសៅរ៍ មន្ទីរសិល្បីខ្មែរ

ក្នុងរយៈពេល២ថ្ងៃ ប្រកបដោយភ្លៀង និងចំហាយខ្យល់ព្យុះ ពុំបានខាឃាំងមិនឱ្យបងប្អូនខ្មែរឆ្ងាយជិតមកចូលរួមកម្មវិធី ពិសេសធ្វើការសំខាន់សំរាប់ជីវិតបានទេ ។ ពួកគាត់ធ្វើការរួច នាំគ្នាពិសារភោជនាហារដ៏ឈ្ងុយឆ្ងាញ់ រៀបចំយ៉ាងប្រណិត ដោយក្រុមអ្នកស្រី ចាប សូស៊ីមន និងម្ហូបមកពីភោជនីយដ្ឋានខ្មែរ ទើបបើកថ្មី តូច ស្អាត ឈ្មោះថា (ដានី កាហ្វេ) មានសម្ភារការី និងមីបំពង យ៉ាងគួរឱ្យស្រកទឹកមាត់ ៕

**ខ្មែរប៉ុស្តិ៍**

---

**មានអ្វីប្លែកនៅហ្វីឡាដែលហ្វៀ**

# ត្រៀមធ្វើបាតុកម្ម នៅរដ្ឋធានីវ៉ាស៊ីនតោន

...ព្រឹត្តិការណ៍ដកអភ័យឯកសិទ្ធ សម រង្ស៊ី បានធ្វើឱ្យមានការរំជើបរំជួលដល់សហគមន៍ខ្មែរនៅអាមេរិក ។ ទូរស័ព្ទនឹងសរសេរអ៊ីមែល ខ្វែងខ្វាតប្រកួកហៅគ្នាឱ្យចេញទៅសម្តែងមតិ នៅថ្ងៃទី ២៨ ខែវិច្ឆិកា ឆ្នាំ ២០០៩ ។ នេះនៅមុខស្ថានអគ្គរាជទូតខ្មែរប្រចាំ ក្រុងវ៉ាស៊ីនតោន ៤៥៣០ ផ្លូវលេខ ១៦ ។

សេចក្តីប្រកាសអញ្ជើញ ពលរដ្ឋឱ្យចូលរួមធ្វើបាតុកម្មអហិង្សារ បានត្រូវផ្សព្វផ្សាយក្នុងអត្ថន័យថា "ដើម្បីការពារបូរណភាពទឹកដីអធិបតេយ្យភាពខ្មែរ ដែលត្រូវបានបរទេសរំលោភឥតឈប់ឈរ" ឬក៏ថា "មាតុភូមិកម្ពុជាជារបស់យើងទាំងអស់គ្នា" ។

ដើម្បីចង់ជ្រាបច្បាស់ លេខទូរស័ព្ទដែលគួរចងចាំ :
**មាស ជា** នៅហ្វីឡាដែលហ្វៀ ២១៥-៨៣៣-៣៦៦៩
**ឆន ទូច** នៅមាសាឈូសែត ៩៧៨-៧២៦-២៥៩១ ៕

---

# ពលរដ្ឋអាមេរិកាំង ចូលរួមមហាសន្និបាត

•••សមាគមខ្មែរ បានចេញសេចក្តីអញ្ជើញ ឱ្យពលរដ្ឋខ្មែរ ក្នុងសហគមន៍ ចូលរួមប្រជុំថែរក្សាសុខភាព ដែលនឹងត្រូវរៀបចំជាមហាសន្និបាទស្តីអំពីបញ្ហាជម្ងឺដែលខ្មែរជាច្រើនបានជួបប្រទះ គឺជម្ងឺទឹកនោមផ្អែម ជម្ងឺស្លាប់ដៃ-ជើង ឬមួយចំហៀងខ្លួន នៅថ្ងៃសៅរ៍ទី ២ ធ្នូ ឆ្នាំ ២០១០ វេលាម៉ោង ១:១០ ដល់ម៉ោង ៤ រសៀល ។ កិច្ចប្រជុំនៅសមា គមខ្មែរ ផ្លូវលេខ ៥ ផ្នែកខាងជើងហ្វីឡាដែលហ្វៀ នឹងជួយណែនាំសហគមន៍ឱ្យអាចចូលរួមយ៉ាងសកម្ម ជាមួយនឹងអ្នកឯកទេស ដើម្បីកាត់បន្ថយជម្ងឺដ៏សែនគ្រោះថ្នាក់មួយចំនួនចេញពីសហគមន៍យើងបាន ។

ទូរស័ព្ទដែលត្រូវទាក់ទងសហគមន៍ខ្មែរ
215-324-4070


coffee

Danny's Café

Foods & Hoagies

1. Beef Stew Serve with Bread..........នំប៉័ងខគោ
2. Curry Chicken Serve with Bread..........នំប៉័ងការីសាច់មាន់
3. Curry Beef Saramann Serve with Bread..........នំប៉័ងសាច់គោ ខការីសារាមាន់
4. Meatball Soup Serve with Bread..........ស៊ុបប្រហិតជាមួយនំប៉័ង
5. Mi Siam..........មីសៀម

GRAND OPENING

1730 Snyder Ave, Philadelphia, PA 19145 / Mon – Fri: 7am – 7pm Saturday: 9 am – 8 pm / Sunday : CLOSED
Tel: 215.467.4082 Fax: 215.467.4642 / Thank You, Please come again !

# HONG KONG
## SUPERMARKET

FAMER´S BEST






$1.69/can




3 for $10

Newly Renovated.
Added new section .
Clean and Improved management !

ទើបនឹងកែលំអរថ្មីឡើងវិញ
បន្ថែមផ្នែកលក់ថ្មីទៀត
ហាងស្អាត ហើយបង្កើន
គុណភាពគ្រប់គ្រង

**Weekly Sale**

លក់ចុះថ្លៃរៀងរាល់សប្តាហ៍




$2.99/bag




$7.99



$2.99






$6.99/box




$1.29/can



$2.49/28oz




$2.49/bag




2 for $3



$4.99 / lb




$4.99

**OPEN 7 DAY 8:00-9:00**

571 ADAMS AVE.PHILADELPHIA,PA19120
Tel: 215-72801300 Fax: 215-728-1600

- ចំណាយ **$140**ដុល្លារ ទទួលបានអង្ករស្រូវស ២៥ ផោន
- ចំណាយ **$100**ដុល្លារ ទទួលបានទូរភេសជ្ជៈ ឬមីកញ្ចប់មួយប្រអប់(តម្លៃ **8.99**)
- ចំណាយ **$25** ដុល្លារទទួលបានទឹកសណ្តែកមួយដប ឬទឹកត្រីមួយដប ។

ឌឹ ខេមបូឌា ដេលី

The Cambodia Daily

ជំណឹងប្រែសម្រួលពីកាសារអង់គ្លេស អត្ថបទបានអនុញ្ញាតិឱ្យធ្វើការចុះផ្សាយដោយ ឌឹ ខេមបូឌា ដេលី ច្បាប់ចេញផ្សាយថ្ងៃសុក្រ ទី២០ ខែវិច្ឆិកា ឆ្នាំ២០០៩

# Gov´t To Slash 10,000 Temp Teacher Position

*By Eang Mengleng And Tim Sturrock*
***THE CAMBODIA DAILY***

More than 10,000 teachers on temporary contracts, most of them in rural areas, will lose their jobs to save money for the 2010 budget, according to an Education Ministry directive obtained yesterday.

This year, the ministry employed 20, 871 teachers and about 400 other workers on temporary contracts, according to the directive dated Oct 23.

"The Education Ministry had asked all provincial and municipal to enact the rule of the government and reduce by 50 percent all the temporary teachers and workers," according to the directive signed by Education Minister Im Sothy.

Secretary of State Mak Vann said yesterday that he did not have on hand data on the pay of temporary teachers or total number of permanent teachers.

"The Education Ministry will examine the temporary teachers all over th country and decide who should be laid off," he said.

Asked about the affect the measure will have on education. Mr Vann referred question to Thoung Boran, director of administration, who said he was too busy to talk to a reporter.

The overall 2010 draft budget of about $2 billion will mark an increase of 11 percent over the 2009 budget of $1.8 billion. Total military spending is to increase by 24 percent and it is projected to account for approximately 14 percent of Cambodia's overall expenses.

The International Monetary Fund said in September that military spending on the wage bill, which is draft legislation to set civil service pay scales, is projected to increase next year and warned against addition spending on the bill because of the risk it posed to education.

"If growth in the overall government wage bill is not checked, it could risk significant crowding out of spending on priority areas like health and education, or lead to continued domestic financing of the deficit," John Nelmes, IMF country representative, said at the time.

Cambodia Independent Teacher Association President Rong Chhun said there are about 90,000 permanent teachers under contract and that the job cuts will hurt rural areas where it is more difficult to hire permanent staff.

The move will result in higher classroom sizes and poorer education standards for areas of the country that already struggle with a lack of education, he said.

"The rural area is the face of the uneducated in Cambodia," he said.

In Samrithy, executive director of the NGO Education Partnership, agreed education would suffer under the program if classroom sizes are allowed to increase further.

"It will affect the quality of education. When the class is so crowed it will hurt the way of teaching and the way of learning, so it will be a problem," he said.

# រដ្ឋាភិបាលនឹងកាត់បន្ថយគ្រូបង្រៀនបណ្តោះអាសន្ន ១០.០០០នាក់

***ដោយ : អ៊ាង ម៉េងឡេង និង** TIM STURROCK*
*THE CAMBODIA DAILY*

យោងតាមសារាចរណ៍ណែនាំរបស់ក្រសួងអប់រំដែលទទួលបានកាលពីថ្ងៃព្រហស្បតិ៍ បានឱ្យដឹងថា ក្រុមគ្រូបង្រៀនជាង ១០.០០០ នាក់ ដែលជាប់កិច្ចសន្យាបណ្តោះអាសន្ន ដែលពួកគេភាគច្រើនស្ថិតនៅក្នុងតំបន់ជនបទនោះ នឹងបាត់បង់ការងាររបស់ពួកគេ ដោយសារការសន្សំថែប្រាក់សម្រាប់ថវិកា ឆ្នាំ ២០១០។

នៅឆ្នាំនេះ ក្រសួងបានជ្រើសរើសគ្រូបង្រៀនចំនួន ២០.៨៧១នាក់ និងបុគ្គលិកដទៃទៀតប្រហែល ៤០០នាក់ក្រោមកិច្ចសន្យាបណ្តោះអាសន្នឱ្យចូលបំរើការងារនេះ បើយោងតាមសារាចរណែនាំចុះថ្ងៃទី២៣ ខែតុលា ។

យោងតាមសារាចរណែនាំដែលចុះហត្ថលេខា ដោយលោក អ៊ុម សិទ្ធិ រដ្ឋមន្ត្រីក្រសួងអប់រំ បានឱ្យដឹងថា ក្រសួងអប់រំបានស្នើទៅប្រធានមន្ទីរអប់រំខេត្ត ក្រុងឱ្យអនុវត្តតាមវិធានការរបស់រដ្ឋាភិបាល ហើយកាត់បន្ថយ៥០ភាគរយនៃគ្រូបង្រៀន និងបុគ្គលិកបណ្តោះអាសន្នទាំងអស់។

លោក ម៉ក់ វ៉ាន់ រដ្ឋលេខាធិការក្រសួងអប់រំ បានមានប្រសាសន៍ឱ្យដឹងថា លោកមិនមានទិន្នន័យនៅក្បែរខ្លួនស្តីពីការចំណាយសម្រាប់គ្រូបង្រៀនបណ្តោះអាសន្ន ឬក៏ចំនួនសរុបនៃគ្រូបង្រៀនអចិន្ត្រៃយ៍ទេ ។

លោកបានមានប្រសាសន៍ថា ក្រសួងអប់រំនិងពិនិត្យមើលគ្រូបង្រៀនបណ្តោះអាសន្នទូទាំងប្រទេស ហើយសម្រេចថា តើនរណាត្រូវគួរជំរុះចោល ។

ដោយត្រូវបានសួរអំពីផលប៉ះពាល់ទៅលើវិស័យអប់រំ ដែលនឹងកើតមានដោយសារវិធានការនេះ លោក ម៉ក់ វ៉ាន់ បានបង្វែរសំណួរទៅសួរលោក ថោង បូរ៉ាន់ ប្រធានរដ្ឋបាលដែលបានមានប្រសាសន៍ថា លោករវល់ណាស់មិនអាចនិយាយជាមួយអ្នកយកព័តិមានបានទេ។

សេចក្តីព្រាងថវិកាសរុបឆ្នាំ ២០១០ ដែលមាន ទឹកប្រាក់ប្រហែល ២ ពាន់លានដុល្លារ និងបង្ហាញនូវកំណើន ១១ ភាគរយច្រើនជាងថវិកាឆ្នាំ ២០០៩ ដែលមានទឹកប្រាក់ ១.៨ ពាន់លានដុល្លារ ។ ការចំណាយសរុបលើវិស័យយោធានឹងកើតឡើងត្រឹម ២៤ ភាគរយ ហើយគេបានប៉ាន់ប្រមាណថា នឹងមានប្រហែល ១៤% នៃការចំណាយសរុបរបស់កម្ពុជា។

មូលនិធិរូបិយវត្ថុអន្តរជាតិ បាននិយាយកាលពីខែកញ្ញាថា ការចំណាយលើវិស័យយោធាទៅលើប្រាក់បៀវត្សរ៍ដែលសេចក្តីព្រាងច្បាប់នេះ នឹងកំណត់កម្រិតប្រាក់ខែសម្រាប់មន្ត្រីរាជការនោះ ត្រូវបានគេប៉ាន់ប្រមាណថា នឹងកើតឡើងនៅឆ្នាំក្រោយនេះ ហើយបានព្រមានចំពោះការចំណាយបន្ថែមទៀត ទៅលើខ្ទង់ចំណាយនេះ ដោយសារតែវាបង្កហានិភ័យដល់វិស័យអប់រំ។

លោក John Nelmes តំណាងប្រចាំប្រទេសនៃមូលនិធិរូបិយវត្ថុអន្តរជាតិ បានមានប្រសាសន៍ថា "ប្រសិនបើកំណើននៅក្នុងខ្ទង់ចំណាយសរុបសម្រាប់ប្រាក់ខែរបស់រដ្ឋាភិបាលមិនត្រូវបានត្រួតពិនិត្យទេ វាអាចប្រឈមនឹងការខ្វះខាត គួរឱ្យកត់សម្គាល់សម្រាប់ការចំណាយលើវិស័យជាអាទិភាពដូចជា វិស័យសុខាភិបាល និងវិស័យអប់រំ ឬនាំឱ្យមានការបន្តផ្តល់ហិរញ្ញវត្ថុសម្រាប់ឱនភាពថវិកា"។

លោក រ៉ុង ឈុន ប្រធានសមាគមគ្រូបង្រៀន កម្ពុជាឯករាជ្យ បានមានប្រសាសន៍ថា មានគ្រូបង្រៀនអចិន្ត្រៃយ៍ចំនួនប្រហែល ៩០.០០០នាក់ ដែលជាប់កិច្ចសន្យា ហើយថា ការកាត់បន្ថយការងារប៉ះពាល់តំបន់ជនបទទីដែលពិបាកក្នុងការជួយបុគ្គលិកអចិន្ត្រៃយ៍។

លោកបានមានប្រសាសន៍ថា ទង្វើនេះនឹងបណ្តាលឱ្យថ្នាក់រៀនមានសិស្សកាន់តែច្រើន និងស្តង់ដាអប់រំចុះខ្សោយសម្រាប់តំបន់ជាច្រើនក្នុងប្រទេសនេះ ដែលកំពុងតែជួបប្រទះនូវកង្វះការអប់រំរួចទៅហើយនោះ។

លោកបានមានប្រសាសន៍ថា "តំបន់ជនបទតំណាងឱ្យអ្នកដែលរៀនសូត្របានតិចតួចនៅក្នុងប្រទេសកម្ពុជា"។ លោក អ៊ិន សិរិទ្ធ នាយកប្រតិបត្តិនៃអង្គការភាពជាដៃគូផ្នែកអប់រំជាអង្គការក្រៅរដ្ឋាភិបាលបានយល់ស្រប ថា វិស័យអប់រំនឹងទទួលរងផល ប៉ះពាល់ដោយសារកម្មវិធីនេះ ប្រសិនបើចំនួនសិស្សនៅក្នុងថ្នាក់ត្រូវបានបណ្តោយឱ្យកើនឡើងថែមទៀត។

លោកបានមានប្រសាសន៍ថា "វានឹងប៉ះពាល់ដល់គុណភាពអប់រំ ។ នៅពេលដែលថ្នាក់រៀនមានសិស្សច្រើនពេក វានឹងប៉ះពាល់ដល់របៀបបង្រៀន និងរបៀបសិក្សា ដូច្នេះវានឹងជាបញ្ហាមួយ"៕

( Continued from page 08)

# Pig Farmers...

Mr Pov did not ask for a ban. But he does want the government to guarantee that a fair proportion of local demand be met by local producers.

"We want them to manage the pork market, how much pork from local farmers and how much from imported sources." he said.

"We want to encourage domestic production and allow farmers to make money. Now, pork from imported sources is overwhelming the market."

Khov Va, a pig farmers in Kampong Cham province, said rising feed prices have only compounded the industry's troubles.

"Last year I had 100 pigs. But now I have only 20 in my pigsty because... the price is not good for me to keep rising," said Ms Va, who implored the government to help raise the price of the product.

(តមកពីទំព័រទី ០៨)

# កសិករចិញ្ចឹមជ្រូកត្អូញត្អែរ...

កសិដ្ឋានចិញ្ចឹមសត្វ ជាពិសេស កសិដ្ឋានចិញ្ចឹមជ្រូកនៅកម្ពុជា នឹងត្រូវប៉ះពាល់ ហើយកសិករនឹងឈប់ចិញ្ចឹមជ្រូក" ។

រដ្ឋាភិបាល បានដាក់បំរាមលើការនាំចូលជ្រូករបស់ថៃ និងវៀតណាម កាលពីខែសីហា ឆ្នាំ ២០០៧ ដើម្បីជួយដល់ផ្នែកកសិដ្ឋានចិញ្ចឹមជ្រូក និងដើម្បីការពារអ្នកប្រើប្រាស់មិនឱ្យមានជំងឺអុតក្តាម ។ ទោះជាយ៉ាងណា ៧ ខែក្រោយមករដ្ឋាភិបាល បានដកបំរាមនេះវិញ ដោយអះអាងថា ការខ្វះខាតការផ្គត់ផ្គង់ជ្រូក បានធ្វើឱ្យតម្លៃជ្រូកកើនឡើងខ្ពស់ពេក ។

លោក ពៅ មិនបានមានការស្នើសុំឱ្យមានការដាក់បំរាមទេ ។ ប៉ុន្តែលោកពិតជាចង់ឱ្យរដ្ឋាភិបាលធានាថា មួយផ្នែកដ៏សមរម្យនៃតម្រូវការក្នុងស្រុកត្រូវបានផ្គត់ផ្គង់ដោយអ្នកចិញ្ចឹមក្នុងស្រុក ។

លោកបាននិយាយថា " យើងចង់ឱ្យពួកគេគ្រប់គ្រងទីផ្សារជ្រូកថា តើមានសាច់ជ្រូកប៉ុន្មានចេញពីកសិករក្នុងស្រុក និងប៉ុន្មានចេញពីប្រភពនាំចូល" ។ "យើងចង់លើកទឹកចិត្តចិញ្ចឹមដល់អ្នកចិញ្ចឹមជ្រូកក្នុងស្រុក និងធ្វើឱ្យកសិកររកលុយបាន ។ ឥឡូវនេះ សាច់ជ្រូកមកពីប្រភពនាំចូលមានច្រើនលើសលប់នៅក្នុងទីផ្សារ" ។

អ្នកស្រី ខូវ វ៉ា កសិករចិញ្ចឹមជ្រូកនៅខេត្តកំពង់ចាម បាននិយាយថា តម្លៃចំណីជ្រូកខ្ពស់ បានធ្វើឱ្យបញ្ហាឧស្សាហកម្មនេះកាន់តែដុនដាប់ទៅ។

អ្នកស្រី វ៉ា ដែលបានអង្វរសុំឱ្យរដ្ឋាភិបាលជួយដំឡើងថ្លៃផលិតផលរបស់ពួកគេនោះ បាននិយាយថា "កាលពីឆ្នាំមុន ខ្ញុំមានជ្រូក ១០០ ក្បាល ។ ប៉ុន្តែឥឡូវនេះ ខ្ញុំមានជ្រូកតែ ២០ ក្បាលប៉ុណ្ណោះ នៅក្នុងរោងជ្រូករបស់ខ្ញុំ ពីព្រោះតម្លៃមិនល្អទេ សម្រាប់ខ្ញុំក្នុងការចិញ្ចឹមជ្រូក" ៕

# ជំណឹងក្នុងសហរដ្ឋអាមេរិក

**ដោយ : ខ្មែរប៉ុស្តិ៍**

**លក់ផ្ទះដែលមានរួចហើយ** : លក់ផ្ទះប្រភេទនេះ បានកើនឡើងនាខែចុងក្រោយនេះ ដែលជាសញ្ញានៃសុខភាពល្អនៃពាណិជ្ជកម្មទិញលក់ផ្ទះ ។ នេះដោយសារតែអំណោយផលនៃ "រង្វាន់ជាប្រាក់ពន្ធ" ចំពោះអ្នកទិញផ្ទះដំបូង ធ្វើឱ្យផ្ទះបានប្តូរម្ចាស់ប្រមាណជា ១០ ភាគរយ លើសខែមុនជាទៀតទាត់ រហូតដល់ខែតុលា ឆ្នាំ ២០០៩ សរុបពីដើមឆ្នាំមក ផ្ទះបានលក់ចេញ ជាង ៦លានខ្នងហើយ ។ សញ្ញាប្រសើរនេះ បានស្រុតទៅវិញខែវិច្ឆិកា ដោយសារច្បាប់ស្តីពីរង្វាន់លើប្រាក់ពន្ធពុំទាន់ច្បាស់ថា នឹងត្រូវពន្យារទៅឆ្នាំក្រោយម្តងទៀតឡើយ ។ អ្នកវិភាគសេដ្ឋកិច្ចនិយាយថា ការលក់ទិញផ្ទះ ដែលមានរួចហើយនេះ ពុំទាន់បានធ្វើឱ្យតម្លៃផ្ទះ ឡើងវិញរួចនៅឡើយទេ តម្លៃនោះបានស្រុតចុះ រហូតដល់ ៣០% រួចទៅហើយ តែយ៉ាងណាក៏ដោយ ពួកគេនិយាយថា ពេលនេះ ជាឱកាសល្អណាស់សម្រាប់អ្នកវិនិយោគ ពីព្រោះតម្លៃផ្ទះពុំឃើញឡើងថ្លៃ ដែលជាហេតុធ្វើឱ្យគេអាចទិញបានជាផ្ទះក្នុងតម្លៃថោក ៕

**ខ្មែរប៉ុស្តិ៍**

## ចំណីដែលឆប់ឆល់ជរាភាពជំខ្លាំងជាងគេក្នុងលោក គឺទឹកផ្លែឈើ "គោជី" នៃព្រៃហេមពាន្ត

HIMALYAN GOJI
Juice

ការសម្ងាត់នៃសុខភាពល្អរបស់ពួកអាស៊ីបាន
ត្រូវរកឃើញ នាផ្ទាំងបុរាណតាំងពីឆ្នាំ ៨០០ គ.ស
ពលរដ្ឋនៃតំបន់មួយនៅព្រៃហេមពាន្ត
មិនប្រែចាស់-សក់ក៏មិន ស-ស្គម
ក៏មិនបាក់-គេថា អ្នកស្រុកបានផឹកទឹក
អណ្តូងមួយដែលមានដើម "គោជី"
ដុះជុំវិញ គេស្មានថា មានវត្ថុពិសិដ្ឋ
អ្វីមួយជួយថែរក្សាពួកគេ ។ ទើប
តែឡូវនេះ គេដឹងថា "គោជី" មាន
ជីវជាតិពិសេសមួយឈ្មោះ POLYSACHARIDES
ដែលពុំមាននៅក្នុងរុក្ខជាតិណាផ្សេងទៀតសោះ ដែលជួយជំរុញប្រព័ន្ធការពារ
ខ្លួនរបស់មនុស្សបាន ។

SHARE THE SECRET

បើចង់បាន Goji មកពិសារសូមជាវតាម www.forever.freelife.com
ឬទូរស័ព្ទលេខ : (267) 253-3947

## NEW PHNOM PENH RESTAURANT

- មីបំពងគ្រឿងសមុទ្រ
- គុយទាវគោគ-គុយទាវសាច់គោ
- ផាត់ថៃ
- ឡុកឡាក់
- មាន់ឆាខ្ញី
- បាយសាច់ជ្រូកអាំង
- មីកន្ថាំងសាច់គោ
- បាយឆាសាច់គ្រប់មុខ

TEL. (215) 389-2122

2301 South. 7th Street. Philadelphia, Pa 19148
(7th & Wolf)

## Leema's 168 Market

5010 Old York Rd, Philadelphia, PA 19141-2707
Contact Phone: (215) 455-1003

ផ្សារ លីម៉ា 168

*ទំព័រពាណិជ្ជកម្ម*

## លោកអ្នកមានជំងឺឫសដូងបាតឬ ?

ឫសដូងបាតក្នុង ? (Internal Pile) ឬឫសដូងបាតក្រៅ ? (External Pile) ជំងឺទាំងពីរនេះ គ្មានបញ្ហាទេ តែកុំទុកឱ្យយឺតពេលវានឹងអាចក្លាយជាដំបៅមហារីកលំបាកព្យាបាលណាស់ ហើយវាអាចបណ្តាលឱ្យស្លាប់បានទៀតផង ។ បើលោកអ្នកមានរងនូវការចាប់ឈឺផ្សាអួលណែនធ្លាក់ឈាមរាំរ៉ៃនេះជាទុក្ខវេទនាយ៉ាងយូរ ។ សូមលោកអ្នកទាក់ទងនឹងខ្ញុំបាទ **គីម គៀន** ដែលអ្នកស្រុកក្បៀនស្វាយ បានឱ្យរហ័សនាមថា "**លោកគ្រូពេទ្យទេវតា ឬលោកគ្រូ ទេព្យឥសី**" ដោយសារខ្ញុំជួយអ្នកជម្ងឺទាំងនោះឱ្យជាសះស្បើយពីការចុកចាប់អួលផ្សាយ៉ាងសាកសិទ្ធិបំផុត ។ លោកអ្នកគ្រាន់តែប្រើថ្នាំបុរាណជប៉ុនផលិតតាមបែបសម័យទំនើប នោះអាចបានជាសះស្បើយដូចបំណង ។ ក្នុងពេលព្យាបាលអាចទៅធ្វើការធម្មតាមិនបាច់ឈប់សម្រាកអ្វីឡើយ ។ អាចជួបតាមទូរស័ព្ទពីម៉ោង ៧ ព្រឹក ដល់ម៉ោង ៦ ល្ងាច រាល់ថ្ងៃ សុក្រ សៅរ៍ អាទិត្យ ។ ពីម៉ោង ៣ ល្ងាច រាល់ថ្ងៃ ច័ន្ទ អង្គារ ពុធ ព្រហស្បតិ៍ ។ ខ្ញុំបាទជាគ្រូទេព្យទេវតា **គីម គៀន**

KIM, Phien 421 E Mentor St. Philadelphia. PA 19120
Phone : 215 680 2059

## Khmermarket Phone Cards

Special Rate for Cambodia, Vietnam & Laos
Order by Phone 267-475-9694
for cell phone & and landline
No connection fee, No expired, No surcharge
Call one minute count one minute 4 cent p/m

$10 =250mins, $20 = 520mins, $30 = 770 mins,$40=1030 mins
Address: 302 w Somerville Ave, Philadelphia, PA 19120
Email: order@khmermarket.biz
Website: www.khmermarket.biz/prepaidphonecard.html




# ពីរដ្ឋបាលកុលសម្ព័ន្ធមករដ្ឋាភិបាលសម័យ

**ប្រែសម្រួលដោយ : ពិន សំខុន (តពីលេខមុន)**

**- ៤ មិថុនា** : បោះឆ្នោតប្រធានាធិបតី លន់ នល់ ជាប់ឆ្នោតបាន ៥៥% ( អ៊ិន តាំ ២៤% កែ អន ២១% ) ។

**- ខែ មិថុនា** : បង្កើតគណបក្សនយោបាយ ដើម្បីចូលរួមការបោះឆ្នោតសភា - លន់ នល់ បង្កើតគណបក្ស "សង្គមសាធារណរដ្ឋ " ទ្រង់សិរិមតៈ បង្កើតគណបក្ស " សាធារណរដ្ឋ " ចំណែកឯ អ៊ិន តាំ និង ចៅ សៅ បង្កើតគណបក្ស " ប្រជាធិបតេយ្យ " ឡើងវិញ ។ ច្បាប់បោះឆ្នោត បានត្រូវទិទានថា " ផ្តល់ជ័យជំនះឱ្យ លន់ នល់ ជាមុន " ដោយគណបក្សទ្រង់សិរិមតៈ និង អ៊ិន តាំ គណបក្សទាំងពីរក៏ដកខ្លួនចេញ ។

**- ខែកក្កដា** : ប្រជាពលរដ្ឋនៅក្រោមការគ្រប់គ្រងរបស់ខ្មែរក្រហម PCK តម្រូវឱ្យស្លៀកពាក់ខ្មៅពេញនគរ លើកលែងតែ សូ ភិម នៅតំបន់បូពា៌ មិនគោរពវិន័យនេះទេ ។

**- ២១ សីហា** : មានការប៉ុនប៉ងធ្វើឃាតលោក សឺង ង៉ុកថាញ់ ។

**៣ កញ្ញា** : បោះឆ្នោតសភាជាតិ ដោយគ្មានអ្នកប្រកួត គណបក្សសង្គមសាធារណរដ្ឋ បាន ១២៦ អាសនៈ ។

**៧-៩ កញ្ញា** : បាតុកម្មហិង្សាប្រឆាំងនឹងទំនិញឡើងថ្លៃ - ទាហានវាយប្រហារគ្នា ដោយគ្មានប្រាក់បៀវត្សច្រើនខែ ។

**- ១៧ កញ្ញា** : បោះឆ្នោតព្រឹទ្ធសភា គណបក្សលោក លន់ នល់ បាន៤០អាសនៈ ដោយគ្មានគូប្រជែង- លោក សូ ខាំខូយ ឡើងជាប្រធានព្រឹទ្ធសភា ។

**- ៦-៧ តុលា** : ស្ពានជ្រោយចង្វា ត្រូវបានពួកកុម៉ង់ដូ យួនខាងជើងកំទេច - គេនាំគ្នាហៅកន្លែងនោះថា " ស្ពានបាក់ " រហូតដល់ស្ពាននោះសង់ថ្មីនៅឆ្នាំ ១៩៩៣ ។

**- ១៤ តុលា** : រដ្ឋាភិបាល សឺង ង៉ុកថាញ់ លាលែង - លោកបានត្រឡប់ទៅរស់នៅវៀតណាមខាងត្បូង ហើយស្លាប់នៅក្នុងគុក នៅឆ្នាំ ១៩៧៦ ។

**- ១៧ តុលា** : រដ្ឋាភិបាល ហង្ស ធុនហាក់ ។

**៤- រដ្ឋាភិបាល ហង្ស ធន់ហាក់ (១៧.១០.១៩៧២ - ១៧.៤.១៩៧៣)**

. នាយករដ្ឋមន្ត្រី : ហង្ស ធន់ហាក់
. ទេសរដ្ឋមន្ត្រីអមទីស្តីការប្រធានាធិបតីសាធារណរដ្ឋ : ម៉ៅ សាយ
. ទេសរដ្ឋមន្ត្រីទទួលបន្ទុកការពារជាតិ : ឋាប នាធិន
. ទេសរដ្ឋមន្ត្រីទទួលបន្ទុកមហាផ្ទៃ : ស ហោ
. ទេសរដ្ឋមន្ត្រីអមនាយករដ្ឋមន្ត្រី : ហែម កេតសណា
. រដ្ឋមន្ត្រីការបរទេស : ឡុង បូរ៉េត
. រដ្ឋមន្ត្រីសាធារណការ និងទូរគមនាគមន៍ : ឃី តាំងលឹម
. រដ្ឋមន្ត្រីកសិកម្ម : ស សុង
. រដ្ឋមន្ត្រីកិច្ចការសេដ្ឋកិច្ច និងហិរញ្ញវត្ថុ : អ៊ិន ធុយ
. រដ្ឋមន្ត្រីសាធារណសុខាភិបាល : អ៊ឹង ស៊ូហៃគីមតេង
. រដ្ឋមន្ត្រីការងារ និងសង្គមកិច្ច : ថាច់ ជា
. រដ្ឋមន្ត្រីអមក្រសួងមហាផ្ទៃទទួលបន្ទុករំដោះ និងស្ថាបនា កំណែនទូទៅ និងផ្គត់ផ្គង់ : លន់ នល់
. រដ្ឋមន្ត្រីក្រសួងពត៌មាន : តាំ រ៉េត
. រដ្ឋមន្ត្រីផែនការណ៍ និងអភិវឌ្ឍន៍ជាតិ : ស៊ុំ ឈុំ
. រដ្ឋមន្ត្រីអប់រំជាតិ-វប្បធម៌-យុវជន និងកីឡា : កែវ ម៉ុងត្រី ។

**- ២២ តុលា** : ទស្សនៈកិច្ច ហិនរី គីស៊្សីងជ័រ រដ្ឋលេខាធិការបរទេសអាមេរិកាំង មកកម្ពុជា ។

**- ២២ ធ្នូ** : មរណភាព សឺង ង៉ុកមិញ នៅប៉េកាំង ការបាត់បង់នេះ ធ្វើឱ្យខ្មែរ ហាណូយ ចុះខ្សោយរឹតតែខ្លាំងឡើង - ពិធីបូជាសពធ្វើនៅ ហាណូយ- អៀង សារី និងភរិយា មកគោរពសព ។

*តទៅលេខក្រោយ*

(តមកពីទំព័រទី ០៦)

# ស្វែងរកការរំដោះតាមមាគ៌ារបស់

ដោយមិន ចាំបាច់ចូលព្រៃជ្រៅស្ងាត់ ចូលទៅកាន់ធមិ ដោយពុំចាំបាច់បួស កាន់វិន័យតឹងរឹង ដោយពុំចាំបាច់ស្លៀកស្បង់ គឺព្រះធមិស្ថិតនៅក្នុងវិញ្ញាណ រីឯវត្តអារ៉ាមគ្រាន់តែជាទីដែលបណ្តុះព្រះធមិក្នុងវិញ្ញាណមនុស្សតែប៉ុណ្ណោះ ។

ប៉ុន្មានសប្តាហ៍ក្រោយមក ប្តីខ្ញុំបានធ្វើការសង្កេតមកលើអកប្បកិរិយាខ្ញុំថា ខ្ញុំបានប្តូរភាពតឹងតែងទៅជាសណ្តោសអាណិតអាសូរបានច្រើនជាមុន ដែលជាហេតុធ្វើឱ្យគូរស្វាមីភរិយាអាចរស់ជាមួយគ្នាយ៉ាងងាយ ហើយញាតិមិត្តជិតឆ្ងាយក៏ទទួលគេបានប្រសើរជាមុនដែរ ហើយដែលសំខាន់ទៅទៀតនោះ ខ្ញុំដឹងថា ខ្ញុំពុំចាំបាច់ចេញប្រាក់ផ្ទាល់ទៅសងថ្លៃពេទ្យនៅភូមិ កុហ្វម៉ាន់ ទេ ពីព្រោះការធានាសុខភាពខ្ញុំ គេគិតឱ្យចាប់តាំងពីថ្ងៃរៀបការរួចទៅហើយ ៕



# ពុទ្ធប្បវត្តិអមដោយរូបភាព

## A Pictorrial Biography of Saky amuni Buddha

❖ រូបភាព និងរឿងដើមជាភាសាថៃ ដោយ គុណាប៉ាយុតា
❖ បកប្រែជាភាសាអង់គ្លេស ដោយ ហ្សីត .អេ.លី
❖ ផាត់ពណ៌ដោយ យ៉ាន់ ហ្វាលី
❖បកប្រែជាភាសាខ្មែរដោយភិក្ខុ គង់ អាំ



❖ Original Illuatration and Naration in Thai by Gunapayuta.
❖ Translation into English by A Lu.
❖ Coloring by Yann Fang Lee
❖ Translation into Khmer by Bhikkhu Kong Am.

**៤១-** ព្រះបរមរាជាទ្រង់ព្រះតិះថា យោបល់របស់រដ្ឋមន្ត្រីទាំងឡាយត្រឹមត្រូវប្រាកដមែន ។ ថ្ងៃជាល់ជាប់តមក ព្រះអង្គទ្រង់ត្រាស់បញ្ជាឱ្យគេរៀបចំពិធីជ្រើសរើសរកបវរកញ្ញាកុមារីស្រីក្រមុំ ដែលមានរូបឆោមល្អដាច់គេក្នុងព្រះនរគ ។ ក្នុងទិវាដ៏មហាឱឡារិកនោះ ក៏មានចេញរាជប្រកាសស្តីពីការជ្រើសរើសនូវបេក្ខនារីទាំងអស់ឱ្យអញ្ជើញមកកាន់រាជធានីនៃនគរកបិលវត្ថុ ។ បេក្ខនារីទាំងអស់ត្រូវដើរជាជួរៗ បន្តបន្ទាប់គ្នានៅមុខព្រះរាជកុមារ និងត្រូវទទួលយកអំណោយរង្វាន់ពីព្រះអង្គផង ។ ព្រះមហាក្សត្រត្រាស់បញ្ជាឱ្យមន្ត្រីមួយក្រុម ដែលមានចំណេះខ្ពស់ខាងពិនិត្យមើលលក្ខណៈអង្គុយត្រង់កន្លែងដែលបេក្ខនារីដើរកាត់ពីមុខព្រះរាជកុមារ ។ មន្ត្រីទាំងអស់មាននូនាទីយ៉ាងម៉ឺតចត់ និងប្រុងប្រយ័ត្នបំផុតចំពោះនាងកញ្ញាក្រមុំណាមួយដែលព្រះរាជកុមារទ្រង់ស្រឡាញ់ពេញព្រះទ័យខ្លាំងជាងគេ ។

**៤២-** ក្នុងឱកាសប្រឡងប្រជែងជ្រើសរើសបវរកញ្ញានោះ កុមារីស្រីក្រមុំទាំងឡាយមកពី និគមជនបទរាជធានីតូចទាំងអស់សុទ្ធសឹងតែមានលក្ខណៈរូមឆោមល្អស្រស់ គួរឱ្យគយគន់គ្រប់ៗគ្នា ហើយម្នាក់ក៏បានទទួលអំណោយពីព្រះហស្ថព្រះរាជកុមារផ្ទាល់ ។ កុមារីស្រីក្រមុំទាំងនោះមានចិត្តសប្បាយរីករាយឥតឧបមា ដោយមានកិត្តិយសបានទទួលនូវអំណោយពីព្រះអង្គ ។ ទោះជាយ៉ាងនោះក្តី នៅពេលដែលពួកនាងត្រឡប់ចូលទៅកន្លែងគេវិញ គេមានអារម្មណ៍ថាពួកគេមិនសូវជាល្អណាស់ណាទេមើលទៅ ។ (**តទៅលេខក្រោយ**)

41- The king considered the suggestion offered by the minister as alright. Then he ordered the selection of the most beautiful girl in the country to take place. On the particular day decreed for the selection, all condidates has to come to the city of Kapilavastu. Each of them was repiured to walk in front of the prince and would receive a present from him. " The King also ordered a group of highly intelligent officials to be stationed in the place where the beautiful girls were to pass before the prince. Their duty was to observe carefully which girl the prince liked best.



42- On the day of beauty contest, condidates from all over the country passed, one after another, in front of the prince. They were all very beautiful. Each of them received a present directly from the hand of the prince. the girl were all very happy and felt honored to accept a present from the prince. However, when they returned to their group, they all began to fear that they might not be pretty enough. ( Continued Issue After )




ចង់ចេញពីភាពទ្រុឌទ្រោម?
RELIV អាចប្តូររូបរាងកាយឱ្យមាំទាំបាន
ពិសារ Reliv រាល់ថ្ងៃ គឺនាំឱ្យមានកម្លាំងកាយ រូបរាងមាំមួន
Reliv អាចទប់ស្កាត់នូវជំងឺមួយចំនួនធំ ដែលកើតមកពីការពិសារចំណីអាហារខ្វះជីវជាតិធ្វើឱ្យសរីរាង្គតាំងដំណើរ
ពិសារ Reliv លោក-អ្នកនឹងដឹង ពីប្រសិទ្ធភាព ចាប់តាំងពីថ្ងៃដំបូង ដែលលោក-អ្នកប្រើ Reliv នេះភ្លាម ។
សូមទូរស័ព្ទជាវនៅលេខ :នៅ Philadelphia (267) 254 8758
នៅ VIRGINIA (703) 415-6257
គ្រឿងផ្សំ 1. RELIV CLASSIC មួយកំប៉ុង
2. Reliv Innergize មួយកំប៉ុង ដែលជាចំណីជីវជាតិ
លាយ RELIV 1 និង RELIV 2 ម្នាងមួយស្លាបព្រាក្នុងទឹកផ្លែឈើ ហើយពិសារម្តង ឬពីរដងក្នុងមួយថ្ងៃ នៅតាមភាពទ្រុឌទ្រោមនៃរាងកាយ " ភាពរឹងមាំកើតឡើងលឿនជឿមិនបាន "
Reliv restores the balance by delivering a unique blend of the vitamins, antioxdants, minerals, proteins, amino acids and phyto-nutrients the body needs to restore energy, fight off infections and feel great - everyday.



# កកើតជាមនុស្សជាតិ

ដោយ : ម៉ម យឹន

ក កើតជាមនុស្សពិតសំណាង ដូចមានភស្តុតាងឃើញជាក់ច្បាស់
ខ ខើចទាំងក្មេងទាំងចាស់ អាយុខ្លីណាស់ស្លាប់ព្រោះកម្ម ។
គ គួរតប្បិគិតកុំឃ្លាត មិនត្រូវប្រមាថធម៌បានផ្តាំ
ឃ ឃើញឱ្យច្បាស់នេះបណ្តាំ ប្រព្រឹត្តមាំទាំខំសង្វាត ។
ង ងប់ទឹងល្បែងតែងវិនាស មនុស្សត្រូវតែជៀសកុំប្រមាថ
ត្រូវតាំងចិត្តជាប់រាប់ជាញាតិ ត្រូវតាមក្បួនខ្នាតនៃមនុស្សជាតិ ។
ច ចេញឱ្យឆ្ងាយកុំប្រហារ ត្រូវមានមេត្តាកុំពិឃាដ
ឆ ឆ្លាតឱ្យណាស់ខំខ្នីឃ្នាត រស់កុំឱ្យឃ្លាតពីសាសនា ។
ជ ជាប់ជឿខុសកលល្បិច រស់សុំកុំភ្លេចពាក្យមេត្តា
ឈ ឈប់កុំងុលក្បែរពែងស្រា ចាញ់កលមាយាចិត្តកំហូច ។
ញ ញ៉ីមញញែមញៀនថ្នាំខ្លាំង សុរាលើកតាំងឥតប្រយោជន៍
ដ ដាមចិត្តជាប់ចិត្តឥតញ្ញោច ញ៉ាំងឱ្យកាយខូចខាតការងារ ។
ឋ ឋានពិតគ្មានពិតប្រាកដ និព្វានពិតខ្សត់ត្បិតតណ្ហា
ឌ ឌិតប្រឌិតរឿងនានា កាព្យខ្មែរពិស្តារមានដោយខ្សត់ ។
ណ ណាត់នាំគ្នាបានស្តាប់ហើយ សុំកុំងៀលឡើយត្រូវអំណត់
ត តោងសញ្ជឹងឱ្យប្រាកដ ពាក្យពិតហ្មត់ចត់មិនងាយពួ ។
ថ ថារឿងនេះពិតបវរ ជាតិមនុស្សទិករសំណាងតើ
ទ ទ្រើងសញ្ជឹងប្រឹងខំដើរ សង្វាតប្រឹងធ្វើឱ្យចំណាប់ ។
ធ ធន់អត់ធ្មត់ត្រូវតែប្រឹង ទើបដល់បានដឹងរឿងត្រូវស្តាប់
ន នេះរឿងរ៉ាវមនុស្សត្រូវចាប់ ជារឿងត្រូវកាប់ដោយមុខដាវ ។
ប បោលចាំបុកចេញចំប្រាវ ខំប្រឹងស្រាវជ្រាវដឹងរឿងរ៉ាវ
ផ ផុងចិត្តផុយដូចដោះអាវ ឱ្យចិត្តស្រួចស្រាវទាំងប្រុសស្រី ។
ព ពឹងធម៌ព្រះពុទ្ធអង្គ កើតធម៌ត្រចង់យល់ស៊ីជី
ភ ភក្តិប្រាកដយល់វិន័យ ទោះជាតិប្រុសស្រីល្អប្រាកដ ។
ម មិនល្ងង់ខ្លៅយល់កំហុស ឥតងាយក្រនោះនៃពាក្យខ្សត់
យ យល់គន្លងដឹងធម៌ហ្មត់ សំណាងខ្ពស់ផុតដ៏បវរ ។
រ រៀបប្រើរ៉ាប់ពីធម៌ព្រះ មានរូបរាងច្បាស់ប្រាជ្ញាស
ល ល្ងង់មិនមានឃ្លាតពីធម៌ យល់ចិត្តបវរចិត្តខំទៀត ។
វ វក់ឥតមានចិត្តឃ្នាតខ្ទី ជួនប៉ះពួកនៃជាសាច់ញាតិ
ស សំណាងមានពិតមិនឃ្លាត កាព្យលើកជាក់ស្បាតជាតិជាមនុស្ស ។
ហ ហាំចំណាប់ពិតត្រឹមត្រូវ ទោះបីជ្រុលជ្រៅគួនធ្វើខុស
ឡ ឡប់ឡិន ព្រោះតែមានមនុស្ស មានចិត្តមិនស្មោះនាំឱ្យស៊ុន ។
អ អញ្ជូប្រុសស្រីជាតិជាមនុស្ស សំណាងមិនខុសពិតមានបុណ្យ
អរសប្បាយណាស់តែងដឹងគុណ លើសលប់ពេកពន់មិនមែនសត្វ ។
សូមឱ្យចិត្តមនុស្សបានកែប្រែ ឈប់ងុបគិតតែចង់ចែងចាត់
ធ្វើអំពើអាក្រក់ក្រខ្វក់ក្តាត់ ថ្ងៃមួយមុខបាត់ជីវិតបង់ ។
អ្នកប្រព្រឹត្តល្អពិតបានសុខ ព្រះធម៌ចែងទុកមកយូរលង់
ឱ្យមនុស្សខិតខំកែតម្រង់ តាំងចិត្តស្មោះត្រង់ជារហូតហើយ ៕

បញ្ជាក់ : ឍ ង ពុំអាចមានពាក្យចាប់ផ្តើមទេ គឺតែងប្រកបជាមួយតួអក្សរផ្សេងតែប៉ុណ្ណោះ ។

សម្ផស្ស កេសា តា-កែវ
Ta-Keo Salon
Cut · Color · Perm · Highlight · Foils · 978-458-8008
Open
Ta-Keo Salon
273 Chelmsford St
Lowell, MA 01851-3328
(978) 458-8008

OFFICE HOURS BY APPOINTMENT
SAMBATH KEO, D.M.D
50 WOOD ST.
LOWELL , MA 01851
Phone : (978) 441 9991
Fax : (978) 441 9996

# អគ្គិភ័យបំផ្លាញផ្ទះជាច្រើនខ្នងនៅខណ្ឌឫស្សីកែវដោយសារផ្ទុះធុងហ្គាស

ដោយ សាំង សុវត្ថិវិទ្ធ
THE CAMBODIA DAILY

ក្រុមមន្ត្រីបាននិយាយកាលពីម្សិលមិញថា ផ្ទះជិត២៣០ខ្នងនៅក្នុងរាជធានីត្រូវបានឆេះកាលពីម្សិលមិញបន្ទាប់ពីធុងហ្គាសសម្រាប់ចំអិនអាហារមួយបានផ្ទុះនៅក្នុងភូមិមួយនៅខណ្ឌឫស្សីកែវដែលមានមនុស្សអ៊ូអរ ។

ក្រុមពន្លត់អគ្គិភ័យបាននិយាយថា ពួកគេបានចំណាយពេលស្ទើរតែពេញមួយថ្ងៃដោយព្យាយាមពន្លត់អគ្គិភ័យនេះ ប៉ុន្តែខ្យល់ខ្លាំងហើយកន្លែងដ៏ចង្អៀតណែននៃសហគមន៍មាត់ទន្លេដែលស្ថិតនៅក្នុងភូមិ៤ សង្កាត់ច្រាំងចំរេះ២ ស្ទើរតែមិនអាចឲ្យពួកគេបំពេញការងារបាន ។

លោក គួប ស្លេះ អភិបាលរងខណ្ឌបានមានប្រសាសន៍ថា "អគ្គិភ័យនេះបានរាលដាលយ៉ាងលឿនពីផ្ទះមួយទៅផ្ទះមួយពីព្រោះផ្ទះភាគច្រើនជាផ្ទះឈើហើយមានខ្យល់ខ្លាំងទៀត" ។

លោកបានមានប្រសាសន៍ថា "វាជាអគ្គិភ័យដ៏ធំបំផុតដែលខណ្ឌរបស់យើងមិនធ្លាប់បានជួបពីមុនមក ។ ប្រជាជនរាប់រយគ្រួសារបានទទួលរងគ្រោះ ។ គ្មាននរណាម្នាក់រងរបួសឬក៏ស្លាប់ទេ ប៉ុន្តែផ្ទះរបស់ក្រុមអ្នកភូមិយើងឆេះអស់រលីង" ។

យោងតាមលោក ណុស សារី អនុប្រធានប៉ូលិសសង្កាត់បានឲ្យដឹងថា អគ្គិភ័យនេះបានចាប់ផ្តើមនៅម៉ោងប្រហែល៨ព្រឹកនៅពេលដែលធុងហ្គាសនៅក្នុងផ្ទះគ្រូពេទ្យមិនស្គាល់ឈ្មោះម្នាក់បានផ្ទុះ ។ លោកបានមានប្រសាសន៍ថា "សូម្បីប៉ុស្តិ៍ប៉ូលិសរបស់យើងក៏ឆេះដែរ ។ ឯកសារទាំងអស់បានឆេះ ហើយការិយាល័យរបស់យើងគ្មានអ្វីសល់ទេ" ។

លោក អ៊ី ចាន់ថា អ្នកពន្លត់អគ្គិភ័យម្នាក់ដែលមានឋានៈជាអនុសេនីយ៍ឯកបានសុំទោសកាលពីរសៀលថ្ងៃម្សិលមិញ ចំពោះការដែលមិនអាចធ្វើបានលើសពីនេះ ។ "យើងសោកស្តាយណាស់ដែលរថយន្តពន្លត់អគ្គិភ័យរបស់យើងអាចចតបានតែលើផ្លូវជាតិលេខ៥ប៉ុណ្ណោះ... ។ មិនមានផ្លូវចូលទៅដល់កន្លែងដែលអគ្គិភ័យឆេះបានទេ ហើយយើងមិនអាចចូលទៅជួយសង្គ្រោះផ្ទះរបស់ជនរងគ្រោះបានឡើយ" ។

លោកបានមានប្រសាសន៍ថា "យើងប្រើអស់លទ្ធភាពរបស់យើងដើម្បីជួយពន្លត់អគ្គិភ័យនេះ ដោយមិនបានបរិភោគអាហារថ្ងៃត្រង់ផង ហើយយើងប្រើរថយន្តពន្លត់អគ្គិភ័យទាំងអស់ដើម្បីជួយពន្លត់ ប៉ុន្តែយើងមិនអាចជួយសង្គ្រោះផ្ទះរបស់អ្នកភូមិណាម្នាក់បានឡើយ ។ ផ្ទះរបស់ពួកគាត់ទាំងអស់ឆេះទៅជាផេះអស់ហើយ" ។

កាលពីរសៀលថ្ងៃម្សិលមិញ ក្រុមអ្នកភូមិស្ថិតក្នុងសភាពតក់ស្លុត ។ ដោយឈរនៅលើគំនរផេះដែលផ្ទះរបស់គាត់ត្រូវបានបំផ្លាញ អ្នកស្រី ប៉ែន ផល អាយុ៥៦ឆ្នាំ បាននិយាយថា "ខ្ញុំគ្មានសល់អ្វីទេ ។ របស់របររបស់ខ្ញុំទាំងអស់ឆេះខ្ទេចហើយ... ប្តីរបស់ខ្ញុំយកបានតែខ្នើយ៣ប៉ុណ្ណោះពីព្រោះគាត់បាត់បង់ស្មារតី ហើយមិនដឹងថា ត្រូវធ្វើអ្វីទេ" ។

នៅក្បែរនោះដែរ អ្នកស្រី នី ខឌី មិនអាចទប់ទឹកភ្នែកបានទេនៅពេលដែលគាត់បានរៀបរាប់ពីអគ្គិភ័យដ៏ខ្លាំងនេះ ។ "ខ្ញុំមិនអាចយកអ្វីបានទេ ផ្ទះរបស់ខ្ញុំស្ថិតនៅកណ្តាលគេ" ៕E

# ហោរាសាស្ត្រប្រចាំថ្ងៃទី ២៧ វិច្ឆិកា - ១០ ធ្នូ



### ឆ្នាំជូត : (ពពួកទេវតាប្រុស ធាតុទឹក)

រាសីលោកអ្នកល្មមធ្យម ។ រាល់កិច្ចការងាររកស៊ីជួញដូរមានការរីកចម្រើន លូតលាស់ទៅមុខដោយសន្សឹមៗ ។ ក្នុងរយៈពេលនេះ បើមានបងប្អូនញាតិមិត្ត ស្គាល់មកបបួលរកស៊ីចូលហ៊ុនជាមួយតោងចេះត្រិះរិះពិចារណាឱ្យបានល្អិតល្អន់ទើបមិនចាញ់បោកគេ ។ ចំពោះគូស្នេហ៍ ក្នុងរយៈពេលនេះប្រសិនបើបានស្គាល់ចិត្តថ្មីមគ្គា ហើយគឺអាចគិតគូររឿងអាពាហ៍ពិពាហ៍បាន ៕



### ឆ្នាំឆ្លូវ : ( ពពួកមនុស្សប្រុស ធាតុដី )

រាសីលោកអ្នកស្រុតចុះខ្លាំង ។ រាល់កិច្ចការងាររកស៊ីជួញដូរជួបនឹងបញ្ហាស្មុគស្មាញច្រើន ។ ក្នុងរយៈពេលនេះ អ្វីដែលលោកអ្នកត្រូវយកចិត្តទុកដាក់នោះ គឺនៅពេលទូទាត់បញ្ជីប្រាក់កាសផ្សេងៗ ចូរប្រយ័ត្នក្រែងមានការភ្លាំងភ្លាត់អាចបង់ខាតទ្រព្យច្រើននឹងអាចកើតមានរឿងក្តីក្តាំទៀតផង ។ ចំពោះអាជីវករអ្នករកស៊ីប្តូរប្រាក់ ឬលក់គ្រឿងអលង្ការ ចូរមានការប្រយ័ត្នប្រយែងក្រែងមានជនខិលខូចលួចបន្លំភ្លែកស្រស់ៗ ៕



### ឆ្នាំខាល : ( ពពួកយក្សស្រី ធាតុឈើ )

រាសីលោកអ្នកស្រុតចុះខ្លាំង ។ រាល់កិច្ចការងាររកស៊ីជួញដូរជួបបញ្ហាលំបាកៗច្រើន ។ ក្នុងរយៈពេលនេះ ទោះជាលោកអ្នកបានប្រកបកិច្ចការងារអ្វីក៏ដោយ ចូរមានការប្រុង ប្រយ័ត្នជាប់ជានិច្ចជា ពិសេសចំពោះអ្នកជំនួញជួញដូរ មុននឹងប្រគល់ ឬទទួលនូវមុខទំនិញសព្វសារពើត្រូវចេះពិនិត្យមើលគុណភាព និងរាប់ចំនួនឱ្យបានត្រឹមត្រូវទើបមិនចាញ់បោកគេ ។ ចំពោះគូស្នេហ៍ក្នុងរយៈពេលនេះច្រើនពាក់មុខយក្សដាក់គ្នា ៕



### ឆ្នាំថោះ : ( ពពួកមនុស្សស្រី ធាតុឈើ )

រាសីលោកអ្នកស្រុតចុះខ្លាំង ។ រាល់កិច្ចការងាររកស៊ីជួញដូរជួបនឹងបញ្ហាស្មុគស្មាញច្រើន ។ ក្នុងរយៈពេលនេះរាល់ចង្រៃឧបទ្រពបានលុកលុយចូលក្នុងកិច្ចការងាររកស៊ី ដូច្នេះទោះជាបានប្រកបការងារអ្វីក៏ដោយតែងប្រយ័ត្នប្រយែងក្រែងមានការភ្លាំងភ្លាត់អាចបង់ខាតទ្រព្យច្រើន ។ ចំពោះគូស្នេហ៍ក្នុងរយៈពេលនេះមានភាពស្និទ្ធស្នាលដូចធម្មតា ៕



### ឆ្នាំរោង : (ពពួកទេវតាប្រុស ធាតុមាស)

រាសីលោកអ្នកស្រុតចុះខ្លាំង ។ រាល់កិច្ចការងាររកស៊ីជួញដូរជួបរឿងរកាំរកូសច្រើន ។ ក្នុងរយៈពេលនេះ បើមានរឿងឈ្លោះវិវាទកើតឡើង ចូរចេះអត់ធ្មត់ និងរំងាប់ចិត្តឱ្យបានត្រជាក់ ។ ចំពោះស្ត្រីភេទក្នុងរយៈពេលនេះមិនត្រូវនិយាយស្តីប៉ប៉ាច់ប៉ប៉ោចឥតបានការច្រើនពេកទេ ព្រោះរឿងរ៉ាវផ្សេងៗអាចកើតចេញពីពាក្យសម្តី ។ ចំពោះគូស្វាមីភរិយា ចូរប្រយ័ត្នប្រយែង ក្រែងមានអ្នកទីបីចូលជ្រៀតជ្រែកនៅក្នុងគ្រួសារ ៕



### ឆ្នាំម្សាញ់ : (ពពួកមនុស្សប្រុស ធាតុភ្លើង)

រាសីលោកអ្នកខ្ពស់ត្រដែត ។ រាល់កិច្ចការងាររកស៊ីជួញដូរបានកាក់កបល្អណាស់ ។ ក្នុងរយៈពេលនេះ ទោះជាលោកអ្នកបានប្រកបការងារអ្វីក៏ដោយ ក៏អាចទទួលបានផលសម្រេចសមតាមបំណងប្រាថ្នាទាំងអស់ ។ លោកអ្នកអាចបណ្តាក់ទុនរកស៊ី ឬក៏ចេញទៅជួញដូរផ្លូវឆ្ងាយ មិនថាផ្លូវគោក ឬផ្លូវទឹកឡើយ គឺសមប្រកបតែទាំងអស់ ព្រោះអាចរកផលកម្រៃបានច្រើនត្រឡប់ចូលផ្ទះ ៕



### ឆ្នាំមមី : (ពពួកទេវតាស្រី ធាតុភ្លើង)

រាសីលោកអ្នកខ្ពស់ត្រដែត ។ រាល់កិច្ចការងាររកស៊ីជួញដូរបានកាក់កបល្អណាស់ ។ ក្នុងរយៈពេលនេះ ទោះជាលោកអ្នកបានប្រកបការងារអ្វីក៏ដោយ ក៏អាចទទួលបានផលសម្រេចសមតាមបំណងប្រាថ្នាទាំងអស់ ។ លោកអ្នកអាចបណ្តាក់ទុនរកស៊ី ឬក៏ចេញទៅជួញដូរផ្លូវឆ្ងាយ មិនថាផ្លូវគោក ឬផ្លូវទឹកឡើយ គឺសមប្រកបតែទាំងអស់ ព្រោះអាចរកផលកម្រៃបាន ច្រើនត្រឡប់ ចូលផ្ទះ ៕



### ឆ្នាំមមែ : (ពពួកទេវតាស្រី ធាតុមាស)

រជួបរឿងរកាំរកូសច្រើន ។ ក្នុងរយៈពេលនេះ បើមានរឿងជម្លោះកើតឡើងចូរចេះអត់ធ្មត់ និងរំងាប់ចិត្តឱ្យបានត្រជាក់ដាច់ខាតមិនត្រូវតបតទាំងកំហឹងទល់នឹងកំហល់ឡើយ ទើបរឿងតូចមិនអាចក្លាយជារឿងធំបាន ។ ចំពោះគូស្វាមីភរិយា ក្នុងរយៈពេលនេះមានគេអុជអាលឱ្យបែកបាក់ ដូច្នេះតោងប្រយ័ត្នទើបបានសុខ ៕



### ឆ្នាំវក : (ពពួកយក្សប្រុស ធាតុដែក)

រាសីលោកអ្នកស្រុតចុះខ្លាំង ។ រាល់កិច្ចការងាររកស៊ីជួញដូរជួបនឹងបញ្ហាលំបាកៗច្រើន ។ ក្នុងរយៈពេលនេះ ចូរកុំធ្វេសប្រហែសឱ្យសោះ ជាពិសេសចំពោះកម្មករសំណង់ដែលប្រកបការងារនៅតាមទីខ្ពស់ទាប ចូរប្រយ័ត្នប្រយែងក្រែងជួបគ្រោះថ្នាក់ឈានដល់ការរលត់សង្ខារទៀតផង ។ ចំពោះគូស្នេហ៍ក្នុងរយៈពេលនេះមិនត្រូវឆាប់ត្រចៀកទន់ជឿសម្តីញុះញង់របស់អ្នកផ្សេងឡើយទើបបានសុខកាយសប្បាយចិត្ត ៕



### ឆ្នាំរកា : (ពពួកយក្សប្រុស ធាតុដែក)

រាសីលោកអ្នកល្អជាមធ្យម ។ រាល់កិច្ចការងាររកស៊ីជួញដូរមានការរីកចម្រើនលូតលាស់ទៅមុខដោយសន្សឹមៗ ។ ក្នុងរយៈពេលនេះអ្វីដែលលោកអ្នកត្រូវយកចិត្តទុកដាក់នោះ គឺមុននឹងហាមាត់និយាយស្តីអ្វីត្រូវចេះប្រយ័ត្នប្រយែងក្រែងមានពាក្យសម្តីភ្លាំងភ្លាត់ប៉ះសិទ្ធិអ្នកដទៃអាចបង្កជារឿងទំនាស់ឥតប្រយោជន៍ ។ ចំពោះស្ត្រីភេទ ក្នុងរយៈពេលនេះ មិនត្រូវដើរផ្លូវឆ្ងាយដាច់សង្វែងតែម្នាក់ឯងឡើយ ៕



### ឆ្នាំច : ( ពពួកយក្សស្រី ធាតុដី )

រាសីលោកអ្នកឡើងខ្ពស់ត្រដែត ។ រាល់កិច្ចការងាររកស៊ីជួញដូរមានការរីកចម្រើនលូតលាស់ទៅមុខជាលំដាប់ ។ ក្នុងរយៈពេលនេះ ទោះជាលោកអ្នកបានប្រកបការងារអ្វីក៏ដោយ ក៏អាចទទួលផល សម្រេចសមតាមបំណងប្រាថ្នាទាំងអស់ ។ លោកអ្នកអាចបណ្តាក់ទុនរកស៊ី ឬក៏ចេញទៅជួញដូរផ្លូវឆ្ងាយ មិនថាផ្លូវគោក ឬផ្លូវទឹកឡើយ គឺសមប្រកបតែទាំងអស់ ៕



### ឆ្នាំកុរ : (ពពួកមនុស្សស្រី ធាតុទឹក)

រាសីលោកអ្នកស្រុតចុះខ្លាំង ។ រាល់កិច្ចការងាររកស៊ីជួញដូរជួបនឹងឧបសគ្គច្រើន ។ ក្នុងរយៈពេលនេះ ដោយសារតែយីអ៊ុនកំពុងតែដាក់ស្រាប់នោះ ដូច្នេះលោកអ្នកមិនត្រូវហ៊ានប្រថុយប្រថានក្នុងការបណ្តាក់ទុនរកស៊ីដោយទ្រង់ទ្រាយធំ ឬក៏ប្រព្រឹត្តល្បែងស៊ីសងឡើយ ប្រយ័ត្នភ្លាត់ស្នៀតអាចវិនាសអន្តរាយទ្រព្យអស់រលីងពីខ្លួន ។ ចំពោះគូស្វាមីភរិយា ក្នុងរយៈពេលនេះមានរឿងរកាំរកូសច្រើន ៕

---

...ម្សៅពោតក្រៅពីគេប្រើវាធ្វើជាចំណែករួមផ្សំមួយក្នុងចំណីអាហារឆ្ងាញ់ៗបានជាច្រើនប្រភេទហើយនោះ ម្សៅពោតដដែលនេះក៏គេអាចនាំយកទៅប្រើប្រាស់ក្នុងរឿងសម្ផស្សរបស់នារីបានទៀតផង ។

## ម្សៅពោត ជួយបំបាត់រោគមុន

ចំពោះប្រសិទ្ធភាពរបស់វា គឺជួយកំចាត់រោគមុនមុខ ដោយគ្រាន់តែណែនាំឱ្យយកម្សៅពោតមួយស្លាបព្រាបាយលាយ ជាមួយនិងទឹកខ្មេះមួយស្លាបព្រាបាយដូចគ្នា ។

បន្ទាប់ពីលាយបញ្ចូលគ្នាក្លាយទៅជាទឹកល្បាយមួយខាប់ៗហើយនោះ យកវាមកលាបលើបរិវេណស្បែកដែលមានរោគមុនខ្សាច់ទុកចោលប្រមាណពី១៥-២០ នាទី បន្ទាប់មកសឹមប្រើសំឡីស្អាតជូតជំរះចេញ ។ បន្ទទៀតលុបលាងមុខឱ្យស្អាតដោយប្រើទឹកក្តៅឧណ្ហៗ នោះ មុនខ្សាច់តូចៗនិងសន្សឹមៗជ្រុះចេញមកអស់ដោយឯងៗតាមធម្មជាតិ ។វិធីនេះអ្នកអាចធ្វើបានដោយញឹកញាប់ឬក៏មួយសប្តាហ៍ម្តងនោះ ផ្ទៃមុខ និងឡើងសរលោងគ្មានរោគមុនមុខយ៉ាងប្រាកដ ៕

---

## បង្ហាប់សាច់ក្បាលពោះ ដោយការទទួលទាន កាហ្វេខ្មៅ



ថ្ងៃនេះយើងមានបច្ចេកទេស ដើម្បីបង្ហាប់ផ្ទត់ក្បាលពោះមកផ្ញើជូនសុភាពស្ត្រីផងទាំងឡាយ ។ យើងហ៊ានធានាថា វិធីនេះមានសុភាពស្ត្រីជាច្រើននាក់ហើយដែលទទួលបានជោគជ័យដូច្នេះ តោងកុំចាំយូរយើងប្រញាប់ទៅមើលទាំងអស់គ្នាថាតើក្នុងនោះមានអ្វីខ្លះ ?

– ចាប់ផ្តើមឡើងដោយការព្យាយាមកំរើក ដៃកំរើកជើងឲ្យបានញឹកញាប់បំផុតអាចដែលធ្វើបាន ។ នោះក៏ព្រោះថា ការកំរើករាងកាយនេះវាជួយឲ្យអ្នកដុតបំផ្លាញថាមពលខ្លាញ់បាន យ៉ាងល្អបំផុត ។

– បន្ទាប់មកគឺការក្រេបទឹកតែឲ្យបានញឹកញាប់ ព្រោះនៅក្នុងតែមានសារជាតិជួយបណ្តេញសារជាតិទឹកដែលលើសកំណត់ ទើបធ្វើឲ្យក្រពះរួមតូច ។ មួយវិញទៀតគួរផ្អាកអាហារប្រៃ ឬអាហារដែលប្រើអំបិលច្រើន ព្រោះសារជាតិប្រៃនេះវាជាអ្នកស្តុកជាតិទឹកបានល្អបំផុត ៕

---

(តមកពីទំព័រទី ០៧)

## ការរំឮកអំពីការលេបទឹកដី...

**កម្ពុជា មិនបានស្គាល់សន្តិភាពទេ** ដូចដែលកិច្ចព្រមព្រៀងក្រុងប៉ារីស បានគ្រោងទុកនោះ និងមិនអាចស្គាល់ជានិច្ច ដរាបណាវៀតណាមនៅតែរាគត្បាត ហើយថៃឡង់នៅតែរំលោភមកលើទឹកដី មកលើប្រជាជន និងមកលើបេតិកភ័ណ្ឌ នៃកម្ពុជា ហេតុនេះ ខ្មែរយើងទាំងអស់គ្នា ត្រូវរួមគ្នា ដើម្បីបន្តការប្រយុទ្ធរបស់យើងដែរ !

ជយោ ប្រទេសកម្ពុជា !

ខ្ញុំសូមអរព្រះគុណ សូមអរគុណ ៕

---

(តមកពីទំព័រទី ០៧)

## "ការី" ភោជនីយដ្ឋានខ្មែរ...

ជាមូលដ្ឋាននៃមុខរបរលក់ម្ហូបនោះទេដែរ ។ តែ "ការី" ថ្ងៃសម្ពោធនោះ បានបង្ហាញ មេចុងភៅពីររូប គឺ វ៉ារី សៅ និង វ៉ាន សាវ៉ាង ថាមានបទពិសោធន៍ក្នុងវិជ្ជាធ្វើម្ហូបកំរិតខ្ពស់ ២០ ឆ្នាំម្នាក់ នៅសហរដ្ឋអាមេរិក នៅកម្ពុជា និងប្រទេសថៃ និងឡាវ ។ រាត្រីនោះម្ហូបដែលទទួលភ្ញៀវពិសារមាន ជៀនជួនត្រី មានសម្លរម្ជូរគ្រឿងឆ្អឹងជំនីជ្រូក មានញាំស្ពៃ មានបំពងបង្គារពិសេស សម្លរឆ្នាំងភ្លើង និងបង្អែមផ្លែឈើ ដែល ម៉ូត ជាអ្នកគ្រប់គ្រងខាងទទួលភ្ញៀវនិយាយថា "ខ្ញុំឆ្លាក់ផ្លែឪឡឹក និងផ្លែឯទៀត ដោយដៃខ្លួនឯងអស់ រយៈពេលពេញមួយយប់" ។



ការបើកភោជនីយដ្ឋានខ្នាតធំ ឬមធ្យម នាពេលនេះ ឬពីមុនមក បានត្រូវអ្នកមានមុខរបរដូចគ្នានិយាយថា គឺជាការប្រឈមនឹងគ្រោះថ្នាក់ខ្លាំងណាស់ ដោយសារខ្មែរមិនចាយលុយលើម្ហូបដែលខ្លួនឯងចេះធ្វើនោះទេ ហើយម្យ៉ាងវិញទៀត ម្ហូបខ្មែរពិបាកធ្វើគេមិនសូវស្គាល់ តែ ការី ការពារថា "ខ្ញុំមានចំណង់លើកកិត្តិយសខ្មែរគ្រប់ពេលដែលខ្ញុំអាចធ្វើទៅបាន" រីឯចុងភៅ វ៉ាន សាវ៉ាង និយាយថា "ខ្ញុំធ្វើមុខរបរភោជនីយដ្ឋាននេះយូរហើយ ខ្ញុំខិតខំរកទិញម្ហូបខ្មែរ មកបរិភោគតែគ្មានកន្លែងណាធ្វើទេ ខ្ញុំបានហូបម្ហូបខ្មែរ ខ្ញុំដឹងថា ម្ហូបនេះ ប្រាកដជាមានទីផ្សារ ខ្ញុំមានជំនឿលើម្ហូបខ្មែរ" ។

ឆ្លើយនឹងសំនួរខ្មែរប៉ុស្តិ៍ ការី បានបង្ហាញការប្រមើលទៅថ្ងៃអនាគតរបស់ "ភោជនីយដ្ឋាន ការី" ដ៏ក្មេងខ្ចីនៃរូបភាពថ្ងៃនេះ និងផ្លាស់ទៅជាទីប្តូរវប្បធម៌មួយ ដែលភ្ញៀវមិនមែនមកត្រឹមតែពិសារភោជនា-អាហារខ្មែរតែប៉ុណ្ណោះទេ តែនឹងទទួលជាមួយគ្នានូវការស្គាល់ជនជាតិខ្មែរ ដែលធ្លាប់មានប្រវត្តិរុងរឿងមករួមរស់នៅទីនេះ ។ ការី បានបង្ហាញការផ្សាយពាណិជ្ជកម្មខ្លួន នៅលើក្របក្រោយនៃទស្សនាវដ្តីវៀតណាម សរសេរជាអក្សរខ្មែរធំៗ.. ការី មានមោទនភាពនឹងឃើញភ្ញៀវជាតិវៀតណាម នាំយករូបអក្សរខ្មែរនោះ មកបង្ហាញខ្លួន ដោយនាំក្រុមគ្រួសារមកពិសារម្ហូបខ្មែរ នៅហ៊្វីឡាដែលហ្វៀ នេះបានដែលវត្តមាននេះនាំឱ្យ ការី មានជំនឿកាន់តែរឹងប៉ឹងឡើងថា "ជំនឿរបស់ខ្លួនប្រហែលមិនខុសទេ" ៕

(តមកពីទំព័រទី ០១)

# ដកអភ័យឯកសិទ្ធិ សម រង្ស៊ី ...

នៅពេលដកអភ័យឯកសិទ្ធិ មេគណបក្សប្រឆាំងរូបនេះ បានសម្រេចគោលដៅពីរយ៉ាងសំខាន់ៗ ដែលសភាខ្មែរ បានជួយជ្រោមជ្រែងយ៉ាងសកម្ម :

១- អារម្មណ៍ពលរដ្ឋខ្មែរយល់ឃើញ អំណាចដ៏ធំមហិមារបស់គណបក្សកាន់អំណាចនៅក្នុងបរិវេណបង្កើតច្បាប់ ពុំបានធ្វើច្បាប់ការពារជាតិខ្លួន និងស្ថាប័នខ្លួនឯងទេ ។

២- សភាជាតិខ្មែរ ធ្វើសកម្មភាពជាថ្មីបន្ថែមទៀត ក្នុងរូបភាពខ្លាចចិត្តប្រទេសវៀតណាម ថាខ្មែរបានធ្វើឱ្យខូចប្រយោជន៍គេ ក្នុងរឿងចែកផ្ទៃដី នៅតំបន់ព្រំប្រទល់នេះ ។

សភាជាតិខ្មែរនៅពេលនេះ មានដំណាងរាស្ត្រ ៩០ នាក់ មកពីគណបក្សប្រជាជន មាន ២៦ នាក់ មកពីគណបក្ស សម រង្ស៊ី មាន ៣ នាក់ មកពីគណបក្សសិទ្ធិមនុស្ស មាន ២ នាក់ មកពីគណបក្សនរោត្តម រណឫទ្ធិ និង ២នាក់ទៀត មកពីគណបក្សហ៊្វុនស៊ិនប៉ិច ។ រដ្ឋធម្មនុញ្ញខ្មែរ បានឱ្យសិទ្ធិទៅក្រុមដំណាងរាស្ត្រ ដែលដឹកនាំសម្លេងលើសពីភាគបី (2/3) អាចឱ្យប្ដូរមាត្រានៃរដ្ឋធម្មនុញ្ញខ្មែរសព្វថ្ងៃនេះបានបើគេចង់ ។ គណបក្សប្រជាជនកាន់អំណាចច្បាប់លើស ៨៤ (សម្លេង 2/3) មានលទ្ធភាពគ្រប់គ្រាន់នឹងការពារជាតិ និងស្ថាប័នខ្លួន ដោយមិនចាំបាច់សមាជិកសភា មកពីគណបក្សណាផ្សេងទៀតទេ ដូច្នេះទទួលការខុសត្រូវលើព្រឹត្តិការណ៍ដកអភ័យឯកសិទ្ធិ សម រង្ស៊ី នេះ តែម្នាក់ឯង ។

ដកបង្គោលខ័ណ្ឌសីមា លោក សម រង្ស៊ី បាន "សម្ដែងមតិ" មិនយល់ស្របនឹងការដាំបង្គោល នៅកន្លែងដែលលោកដកចេញនោះ ពុំមែនមានន័យថា លោក "គូសផែនទីផ្លូវការ" នោះទេ ។ ការសម្ដែងមតិ គឺជង្គើមនៃសភា ដែលសម្លេងភាគច្រើនតែងយកចិត្តទុកដាក់ពីសម្លេងប្រឆាំង ដើម្បីតាក់តែងច្បាប់ឱ្យបានប្រសើរបំផុត និងបំរើជាតិដោយគុណភាពខ្ពស់ ។ សភាជាតិខ្មែរពេលនេះ ជាសភាគ្មានកិត្តិយស ដោយមានតំណាងរាស្ត្របីរូបត្រូវគេដឹងថា គ្មានសេរីភាពគ្រប់គ្រាន់នឹងសំដែងមតិ គឺ : សម រង្ស៊ី . មូ សុខហួ . ហ៊ូ វ៉ាន់ ។ នោះជាសញ្ញានៃការគ្រោះថ្នាក់ចំពោះជាតិ ដ៏សំខាន់មួយ នៅពេលដែលអំណាច (សម្លេង 2/3) ស្ថិតនៅក្នុងកណ្ដាប់ដៃសភាគ្មានកិត្តិយសដូចសភាខ្មែរថ្ងៃនេះ ។

ចំណែកឯមូលហេតុនៃការដកអភ័យឯកសិទ្ធិទៀតសោត គឺធ្វើចំពោះដំណាងរាស្ត្រ សម រង្ស៊ី កំពុងបង្ហាញកិច្ចការផ្ទៃដីខ្មែរ ដែលមតិសាធារណ រាប់ទាំងសភាខ្លួនឯង យល់ថាបានបាត់បង់ទៅក្នុងការចំណេញរបស់វៀតណាម ។ មតិសាធារណបានមើលឃើញ អំណោយផលដ៏ច្រើន ដល់ជនជាតិនៃប្រទេសជិតខាងមួយនេះ ដែលទទួលបានពីគណបក្សប្រជាជនដឹងគុណចំពោះការលើកពួកគេឱ្យចូលរួមដណ្ដើមអំណាចបាន ។ ជាថ្មីម្ដងទៀត ការដកអភ័យឯកសិទ្ធិជាវិធានការណ៍តូចមួយ ដែលគណបក្សប្រជាជន ត្រូវថ្លឹងថ្លែង ថាតើជំហររបស់ខ្លួនរឹងមាំជានិរន្ដន៍ហើយឬ នៅ ? ក្នុងគំរូនៃប្រទេសផ្ដាច់ការជាច្រើនវិធានការណ៍កាន់តែខ្ពស់នឹងត្រូវអនុវត្តន៍រហូតដល់ដំណាក់ការណ៍ "កំទេចចោល" នៅពេលដែលគេយល់ថា គ្រោះថ្នាក់នៃការបាត់បង់អំណាចនឹងមកដល់ ដូចបទពិសោធន៍នៃអតីតកាលដែលលោក សម រង្ស៊ី ធ្លាប់ទទួលកាលពីឧិកាសបាតុកម្ម ខែមីនា ឆ្នាំ ១៩៩៧ តែរបបនោះ ធ្វើមិនបានសម្រេចនាពេលនោះ ។

ស្របគ្នានឹងខួបនៃសន្ធិសញ្ញាក្រុងប៉ារីស ខែ តុលា ឆ្នាំ ១៩៩១ ប្រជាពលរដ្ឋខ្មែរ នៅកម្ពុជា នឹងនៅជុំវិញសាកលលោក បាននាំគ្នារំលឹកគំនិតដ៏ឆ្នើមនៃ អ.ស.ប ក្នុងការស្វែងរកសន្តិភាពឱ្យពលរដ្ឋកម្ពុជា ក្នុងទឹកដីដែលខ្លួន មានតាំងឆ្នាំ ១៩៥៤ - គំនិតនោះ បានត្រូវអនុវត្តន៍យ៉ាងពេញលេញ នាឆ្នាំ ១៩៩៣ - តែ១៨ឆ្នាំក្រោយមក លោក សម រង្ស៊ី ចង់បង្ហាញថា "ផ្ទៃដីខ្មែរបានរួមតូចហើយ" គឺបង្ហាញនៅកន្លែងដែលមានសេរីភាពជាងក្នុងមន្ទីររដ្ឋសភាខ្មែរ ដែលជាកន្លែងធ្វើការជាផ្លូវការរបស់លោក ។ ការដកអភ័យឯកសិទ្ធិរឹតតែធ្វើឱ្យមតិ-សាធារណគាំទ្រលោក ហើយចោទប្រកាន់ចំពោះសភាខ្មែរកាន់តែខ្លាំងឡើង ដោយកម្លាំងមួយ ហៅថា "អំណាចសាធារណ" ។ លោក សម រង្ស៊ី ក៏ ដូចលោក កឹម សុខា នៃគណបក្សសិទ្ធិមនុស្ស ពុំមានអំណាចក្នុងរដ្ឋមែនពិតតែមានអំណាច "មតិសាធារណ" ដ៏រឹងមាំ អាចប្រើជាល់នឹងសំរាប់ទប់អំណាចផ្ដាច់ការបានច្រើនក្រែលដែរ ហើយកម្លាំងនៃអំណាចនេះ អាចនឹងរីករឹងយ៉ាងឆាប់រហ័ស ប្រសិនបើការបំពានរបស់គណបក្សប្រជាជន មានភាពអយុត្តិធមិកាន់តែហួសហេតុឡើង។

នៅមានគណបក្សខ្មែរពីរទៀត ដែលមានទ្រង់ទ្រាយធ្វើឱ្យមតិសាធារណច្រឡំថា ជាបក្សប្រឆាំង គណបក្សហ៊្វុនស៊ិនប៉ិច និងគណបក្សនរោត្តម រណឫទ្ធិ ជាគណបក្សរាជានិយម អតីតព្រះមហាក្សត្រនរោត្តម សីហនុ តែងតែធ្វើការជាដៃគូររបស់គណបក្សកាន់អំណាចជារហូតមក ។ គណបក្សទាំងពីរនេះ មានសមាជិកជាន់ខ្ពស់របស់ខ្លួនធ្លាប់មានស្នាដៃ ធ្វើចម្បាំងនឹងគណបក្សប្រជាជនកម្ពុជា ជាឯកជន តែពុំមានលទ្ធភាពប្រឆាំងនឹងសម្ដេចនរោត្តម សីហនុ ដែលជាសម្ព័ន្ធមិត្តដ៏ស្មោះនៃប្រទេសកុម្មុយនិស្ត និងលោកនាយករដ្ឋមន្ត្រី ហ៊ុន សែន បានទេ ។ រូបភាពរបៀបនេះធ្វើឱ្យបក្សប្រឆាំងពិតប្រាកដ គឺ គណបក្ស សម រង្ស៊ី និងគណបក្សសិទ្ធិមនុស្សរងគ្រោះបាន ពីព្រោះមិនហ៊ានបង្ហាញពីជំហរច្បាស់លាស់របស់ខ្លួនថា មានសត្រូវដល់ទៅពីរ គឺគណបក្សប្រជាជន និងគណបក្សរាជា សីហនុនិយមផងរួមគ្នា ។ នេះជាបុព្វហេតុផង ជាលេសផងសម្រាប់ឱ្យពលរដ្ឋមួយចំនួននៅឈរទ្រឹង ដោយគ្មានប្រតិកម្ម ចាំមើលព្រឹត្តិការណ៍ ដែលធ្លាប់ធ្វើឱ្យពួកគេរងរបួសនាអតីតកាល ហើយបន្តកើតឡើងនាបច្ចុប្បន្នកាលផង ។

ការពិតទាំងរដ្ឋអំណាចកម្ពុជា ទាំងប្រទេសកុម្មុយ-និស្តទាំងពីរ នៅក្រោមសម្ពាធយ៉ាងមាំរបស់ អ.ស.ប នៅឡើយ ដែលជាអំណោយផលដល់គណបក្ស សម រង្ស៊ី និងគណបក្សសិទ្ធិមនុស្ស ធ្វើការប្រកបដោយប្រសិទ្ធភាពបាននៅឡើយ ដូចជាទង្វើដកអភ័យឯកសិទ្ធិលោក សម រង្ស៊ី ធ្វើឱ្យលោកមេបក្សប្រឆាំង អាចចូលទៅសភាអឺរ៉ុប និងសភា អ.ស.ប ក្រុងញ៉ូវយ៉ក បើកកកាយថា "នរណាខ្លះ ដែលយកពលរដ្ឋ និងប្រទេសខ្មែរ ទៅដាក់ឱ្យជារណបបរទេស ផ្ទុយនឹងឧត្តមគតិសន្ធិសញ្ញាក្រុងប៉ារីស ឆ្នាំ ១៩៩១ "។ លោក សម រង្ស៊ី ដឹងច្បាស់ថា " រកសន្តិភាពឱ្យកម្ពុជា គឺជាមាគ៌ាប្រកបដោយសង្គ្រាម " ហើយពលរដ្ឋខ្មែរកាន់តែច្រើនឡើង បានក្លាយជាសកម្មជនជាមួយ សម រង្ស៊ី ដោយសារតែចង់បានសន្តិភាពជូនកម្ពុជានោះ ៕


## សូមជួយទិញសៀវភៅខ្មែរ

**អង្គការជានរណា ?**
ជាសៀវភៅកំណត់ត្រានូវរឿងពិត ដែលបានកើតឡើងនៅក្នុងប្រទេសកម្ពុជា ជំនាន់ខ្មែរក្រហមកាន់អំណាច ហើយអ្នកនិពន្ធវែកមុខអ្នកណាដែលជាឃាតករ ដែលគេឱ្យឈ្មោះថា អង្គការនោះ ។ សៀវភៅរួមមានពក្យាល :

**ភ្នំពេញមុនឆ្នាំ ១៩៥៥**
អ្នកនិពន្ធ កែវ ប៊ុនធឿន បានកត់ត្រាការផ្លាស់ប្ដូរមុខមាត់ទីក្រុងភ្នំពេញ ពីជំនាន់មួយទៅជំនាន់មួយ និងហេតុការណ៍ដែលបានកើតឡើងក្នុងជំនាន់នោះ ។

**ទស្សនាវដ្ដីខេមរៈបុត្រ :**
លោក បណ្ឌិត ឌុក រ៉ាស៊ី ធ្វើអត្ថាធិប្បាយពីសិទ្ធិមនុស្ស ប្រវត្តិនៃសិទ្ធិមនុស្ស រហូតដល់យកសិទ្ធិមនុស្សធ្វើជាមូលដ្ឋាន ដើម្បីរៀបចំសង្គមរៀបចំច្បាប់រដ្ឋ ធ្វើឱ្យប្រទេសជាតិមានភាពសុខដុមរម្មនា ។

បើលោកអ្នកចង់លក់ ចង់ទិញ ឬចង់ផ្សព្វផ្សាយអ្វីផ្សេងៗ សូមអញ្ជើញផ្សព្វផ្សាយក្នុងទំព័រសារព័ត៌មានខ្មែរប៉ុស្ដិ៍ ដែលអ្នកអានជាទូទៅចូលចិត្ត លោកអ្នកនឹងបានជួបភ្ញៀវរបស់លោកអ្នកយ៉ាងឆាប់រហ័ស ។

សូមទូរស័ព្ទមក **សុបិន (267) 253-3947**

**ប្រវត្តិសាស្ត្រនៃកម្ពុជា**
លោក វ៉ាន់ឌីកាអុន ទើបនឹងសរសេរសៀវភៅប្រវត្តិសាស្ត្រនេះ ពីសម័យអាណានិគមបារាំង មកដល់បច្ចុប្បន្នកាល ។ ភាគទី១/ភាគទី២ ចេញផ្សាយរួចហើយ នៅប្រទេសបារាំង ។
Email. VANDY_KAONN@YAHOO.COM

**ប្រវត្តិសាស្ត្រខ្មែរបច្ចុប្បន្ន**
ថាស ស៊ីឌី ដែលរៀបរៀងដោយ គិម សំខុន ហើយផ្សព្វផ្សាយនៅវិទ្យុសម្លេងខ្មែរ-អាមេរិកាំង ។ ថាស ស៊ីឌី ចំនួនបួនម៉ោងស្ដីពីប្រវត្តិកម្ពុជា ចាប់តាំងពីសម្ដេចនរោត្តម សីហនុ បានធ្លាក់ពីអំណាចឆ្នាំ ១៩៧០ មកដល់ឆ្នាំ ២០០៤ ។
ទូរស័ព្ទ 215-680-2059

| មានលក់នៅស្រុកអាមេរិក | ស្រុកបារាំង |
|---|---|
| -សាក់ម៉ានី (ខ្មែរ) ......10$ | ......10€ |
| -របាំក្បាច់បុរាណ ភ្លេង ល្ខោន (បារាំង) ......10$ | ......10€ |
| -រឿងរាមកេរ្តិ៍ (ខ្មែរ-បារាំង) ......10$ | ......10€ |
| -រាមកេរ្តិ៍តាមផ្ទាំងវិហារព្រះកែវមរកត (ខ្មែរ-បារាំង)...10$ | ......10€ |
| 1-CAMBODGE (Français) ......10$ | ......10€ |
| 2-CAMBODGE (Français) ......10$ | ......10€ |

**USA**
The Khmer post
Call Sabane : (267) 253-3947

**FRANCE**
Cambodiana Vidéo
22.rue du Disque 75013 Paris
Tél : 01 45 84 07 57

**ប័ណ្ណបញ្ជាកាសែតខ្មែរប៉ុស្ដិ៍**
ឈ្មោះ និងអាស័យដ្ឋានរបស់ខ្ញុំ

ឈ្មោះ :..........

អាស័យដ្ឋាន..........

**ខ្ញុំចង់បាន :**

☐ កាសែតខ្មែរប៉ុស្ដិ៍ ១ខែ មាន២លេខ ៦ខែ $30 ១២ខែ $60
☐ សៀវភៅឈ្មោះ..........តម្លៃ $..........
☐ ស៊ីឌីប្រវត្តិសាស្ត្រខ្មែរ ៤ ម៉ោង តម្លៃមួយសិត $30
ខ្ញុំភ្ជាប់សែក ឬ មនីអដ័រ មក U.A.M.G តម្លៃ $..........
ផ្ញើមក U.A.M.G 438 LINDLEY AVE .PHILADELPHIA PA 19120
Phone : KIM PHIEN 215-680-2059 or Saben 267 253 3974

ខ្មែរប៉ុស្ដិ៍ រកអ្នកតំណាងពាណិជ្ជកម្មនៅ ឡូវែល រដ្ឋម៉ាសាឈូសែត ទទួលបានកំរៃខ្ពស់ ។
សូមទំនាក់ទំនងមក **សុបិន** តាមរយៈលេខទូរស័ព្ទ (267) 253-3947 ។ សូមអរគុណ !

**Your Advertisement Is Here For Less than $10 for two weeks!**

**ដំណឹងពីការលក់ និងទិញផ្ទះក្នុងតំលៃសមរម្យ**
នាងខ្ញុំឈ្មោះ **សាវឿន** ធ្វើការនៅការិយាល័យ Advance Realty One, LLC. " The Full Service Discount Expert," ទិញ និងលក់ផ្ទះ ។
បើអស់លោកអ្នកចង់លក់ និងទិញផ្ទះ សូមទំនាក់ទំនងមកនាងខ្ញុំតាមលេខ :
(215) 833-6673 ។ សូមអរគុណ !

# NEW ASIA AMERICA TRAVEL, INC.

Domestic & International Travel Services

Serve all major airlines: បំរើលោកអ្នកដោយក្រុមហ៊ុនអាកាសចរសំខាន់ៗជាច្រើន
Tours-cruises រៀបចំដំណើរកំសាន្ត "ទួរ" តាមនាវាចរ
Reentry permits/visa លិខិតទិដ្ឋាការ "រីអិនទ្រី ភើមីត"
Passport photos រូបថតដាក់លិខិតឆ្លងដែន
Honeymoon packages – specials ទេសចរក្នុងឱកាសរៀបការថ្មីថ្មោងពិសេស
Single paper
Special Group Tours រៀបចំធ្វើដំណើរពិសេសជាមួយក្រុម
Walt Disney 4-8 days ដំណើរទៅ "វ៉ាល់ឌីសណេ" ៤-៨ថ្ងៃ
Las Vagas 4-7 days ដំណើរទៅ "ឡាសវេហ្គាស" ៤-៧ថ្ងៃ
California 7-10 days ដំណើរទៅ "កាលីហ្វូញ៉ា" ៧-១០ ថ្ងៃ
Hawaii 6-14 days ដំណើរទៅ "ហាវ៉ៃ" ៦-១៤ថ្ងៃ
Caribbean –Mexico ដំណើរទៅ "ខារីប៊ាន-មិកស៊ិក"
Europe 7-21 days ដំណើរទៅ "អឺរ៉ុប" ៧-២១ថ្ងៃ
Asia: China, Hong Kong, ដំណើរទៅអាស៊ី :ចិន,ហុងកុង
Singapore, Malaysia, ដំណើរទៅ សិង្ហបុរី
Thailand, Cambodia 10-21 days. ដំណើរទៅប្រទេសថៃ-កម្ពុជា ១០-២១ថ្ងៃ
Money Transfer (Vietnam only) ផ្ញើការផ្ញើប្រាក់ (វៀតណាមប៉ុណ្ណោះ)
Citizenship test ធ្វើតេស្តសំរាប់ចូលសញ្ជាតិ
Pin and Pinless phone cards. មានកាតទូរស័ព្ទ មានលេខសម្ងាត់ ឬគ្មាន

Dung Phat Plaza Tel: (215) 468-7876
1110 Washington Ave., #6 Fax: (215) 468-7917
Philadelphia, PA 19147 E-mail: info@naatravel.com
www.newasia-americatravel.com

# DRANOFF ASSOCIATES

*Attorneys at Law*

ដ្រាណុហ្វ អាសូស៊ីយេត (DRANOFF ASSOCIATE ) គឺជាមណ្ឌលការពារតាមផ្លូវច្បាប់ ដែលធ្វើការប្រកបដោយភក្ដីភាព ដើម្បីតំណាងឱ្យអ្នករងគ្រោះដែលមានរបួសរាងកាយ ។

ស្ទីវិន ដ្រាណុហ្វ (STEVEN DRANOFF) គឺជាមេធាវីនៅសាលាក្ដីមានបទពិសោធន៍៣៥ឆ្នាំ ធ្វើជាតំណាងឱ្យឯកជន ដែលពុំមែនឱ្យក្រុមហ៊ុន ឬក្រុមធានារ៉ាប់រងទេ ។

យើងធានាថា ផ្ដល់គុណភាពសេវាច្បាប់យ៉ាងខ្ពស់ ហើយយកចិត្តទុកដាក់ ជាពិសេសដល់អតិថិជនរបស់យើង ។

យើងធ្វើការដោយយកកំរៃពីការងារដែលប្រគល់ឱ្យ - បានន័យថា លោកអ្នកមិនចាំបាច់ចេញថ្លៃចំណាយអ្វី មុននឹងលោកអ្នកទទួលប្រាក់សងពីមុខរបួសលោកអ្នកនោះទេ ។

ជំនួយខាងផ្លូវច្បាប់អាចផ្ដល់ជូនជាភាសា ស្ប៉ាញ៉ុល ខ្មែរ វៀតណាម កូរ៉េ និង ចិន ។

សូមអញ្ជើញទូរស័ព្ទមកពេលនេះភ្លាមចុះ ដើម្បីពិគ្រោះសម្ងាត់ដោយមិនគិតថ្លៃ ឬក៏អញ្ជើញមកជួបនៅការិយាល័យយើងក៏បាន ។

DRANOFF ASSOCIATES

121 South Broad Street, Suit 1210, Philadelphia, PA 19107
215-732-3333 (phone) 215-732-8059 (fax)
sdranoff@dranofflaw.com

# ឱសថស្ថានខ្មែរ

Sav-Mor PHARMACY
Tel: 215-467-1220

Sav-Mor PHARMACY
Sam EA R.Ph.
2232 S. 7th St. (7th & Wolf) Philadelphia, Pa 19148
Tel: 215.467.1220 Fax: 215.467.1447

## បំរើលោកអ្នកដោយមិត្តភាព និងទាន់ចិត្ត

- Sav-Mor គឺជាឱសថស្ថានបំរើ ការចែកចាយថ្នាំ ហើយអាចពន្យល់ពីរបៀបប្រើប្រាស់ថ្នាំ តាមវេជ្ជបញ្ជាជាភាសាខ្មែរបាន
- យើងទទួលយកនូវ MEDICARE MEDICAID និង INSURANCES ជាច្រើនទៀតផង យើងមានលក់កាត សំរាប់ទូរស័ព្ទទៅស្រុកខ្មែរ ឬទៅអន្តរជាតិ

*Accept most insurance plans including Medicare & Medicaid
*Easy Prescription transfer
*Inside. Prepaid phone card. Call Cambodia.

NOEL TAX CONSULTANTS

# Financial Services

## សេវាប្រកបដោយវិជ្ជាជីវៈ :

- ខ្ចីប្រាក់ទិញផ្ទះ MORTGAGE
- អន្តោប្រវេសន៍ IMMIGRATION
- បកប្រែភាសា TRANSLATION
- ធ្វើប្រថាប់ត្រាបញ្ជាក់លិខិតផ្លូវការ-NOTARY
- មានសេវាមើលកូន នឹងថែទាំផ្ទះសម្បែង

## ណូអែល មជ្ឈមណ្ឌលសេវាធ្វើតាក់

សម្រាប់មុខរបរ ឬឯកជន-កត់ត្រាចំណូលចំណាយប្រចាំថ្ងៃនឹងប្រចាំត្រីមាស អ្នកឯកទេសចំណាន នឹងធ្វើតាក់យ៉ាងប្រសើរជូនលោកអ្នក

អាស័យដ្ឋាន : 6341RISING SUN AVE Philadelphia PA 1911
Phone (215) 821-2443
Fax (215) 821-2446
E-mail noel.tax@gmail.com

# Nationwide

Insurance & Financial Service

## សេវាធានារ៉ាប់រង និងហិរញ្ញវត្ថុ

We offer Cheap Price for Every Client

## យើងធ្វើជូនគ្រប់ភ្ញៀវដោយតម្លៃថោក

Business Liability Insurance ធានារ៉ាប់រងជំនួញលោកអ្នក
Home Insurance ធានារ៉ាប់រងផ្ទះសម្បែង
Health Insurance ធានារ៉ាប់រងសុខភាព
Auto Insurance ធានារ៉ាប់រងរថយន្ត
Life Insurance ធានារ៉ាប់រងជីវិត

Discount 30% when you purchase Home & Auto Insurance
ចុះតម្លៃ ៣០ % បន្ថែមបើលោកអ្នកទិញ ធានារ៉ាប់រងផ្ទះ និងរថយន្តរួមគ្នា

South Philadelphia office:
600 Washington Ave Suite #8 Philadelphia, PA 19147
Tel: (215) 463-1257 , Fax: (215) 463-2036

# ភោជនីយដ្ឋានខ្មែរ

# Kavei
## CAMBODIAN RESTAURANT

Authentic Khmer • Thai • Lao • Vietnamese Phở

320 W OREGON AVENUE (OREGON MARKET, SOUTH PHILLY)

**215.952.6688**

- ភោជនីយដ្ឋានយើងខ្ញុំ ចាប់ផ្តើមបើកពីថ្ងៃហើយ!
- មានម្ហូបខ្មែរពិសេសៗជាច្រើនមុខ ម្ហូបថៃ ឡាវ និង ហ្វៀតណាម
- មានទទួលសម្រាប់ពិធីជប់លាង ខួបកំណើត និង ពិធីផ្សេងៗ
- មានតន្ត្រីសម័យកំដររៀងរាល់ល្ងាច ថ្ងៃសុក្រ-សៅរ៍-អាទិត្យ
- លោកអ្នកអាចទូរស័ព្ទមកកក់ទុកមុនបាន
- មានកន្លែងចតរថយន្ត ដ៏ធំទូលាយ





OPEN 7 DAYS A WEEK
Dine In or Take Out

20% OFF
DINNER
Cannot Combine
with Other Offer
Expire: 12/24/09

10% OFF
DINNER
TAKE OUT
Cannot Combine
with Other Offer
Expire: 12/24/09



